ព្រះរាជបណ្ណាល័យកម្ពុជា

# កម្ពុជសុរិយា

## សៀវភៅចេញរាល់ខែ ពីព្រះរាជបណ្ណាល័យ

ឆ្នាំគម្រប់ពីរ

ខ្សែ ១




ក្រុងភ្នំពេញ

រោងពុម្ពរាជការ គូវែរណឺម៉ង់

គ្រិ. ឆ្នាំ ១៩២៧

ព. ស. ២៤៧០



អ្នកទទួលខុសត្រូវ ជុំ-មៅ

# សេចក្តីបញ្ជាក់អំពីការបោះពុម្ពផ្សាយជាលើកទី ២
# នៃ ទស្សនាវដ្តី កម្ពុជសុរិយា

សៀវភៅដ៏ក្រាស់នេះ ជាកម្រងទស្សនាវដ្តី "កម្ពុជសុរិយា" ដែលបោះពុម្ពឆ្នាំទី ១ ពី គ.ស. ១៩២៦-២៧ ។

គោលបំណងរបស់យើង ក្នុងការរើយកមកបោះពុម្ពជា ១ សៀវភៅនេះជាថ្មី គឺអាស្រ័យដោយសេចក្តីយល់ថា សព្វថ្ងៃនេះ មានអ្នកសិក្សាស្រាវជ្រាវខាងអក្សរសាស្រ្ត-វប្បធម៌ជាតិកាន់តែច្រើនឡើង ៗ ។ ជនទាំងនេះ តែងត្រូវការចាំបាច់រកឯកសារចាស់ៗ ដែលមានផ្សាយហើយ យកមកធ្វើការពិនិត្យស្រាវជ្រាវនិងជាការសំអាងហេតុផលផ្សេងៗ ក្នុងស្នាដៃថ្មីរបស់ខ្លួនផង ។ ក្នុងបណ្តាសៀវភៅអក្សរខ្មែរដែលបោះពុម្ពផ្សាយមុនគេ គឺមានតែទស្សនាវដ្តី «កម្ពុជសុរិយា» នេះឯង ដែលកាលនោះអស់លោកបណ្ឌិតខ្មែរយើង លោកបានតាក់តែងនិពន្ធអត្ថបទ ហែហូរតាមព្រឹត្តិការណ៍ដែលមានក្នុងសម័យនោះ អាចចាត់ទុកបានជាឯកសារយ៉ាងសំខាន់បំផុត ពុំងាយរកបាន ។ អ្នកស្រាវជ្រាវ អាចរកឃើញជាក់ច្បាស់នូវហេតុការណ៍ដែលកើតមានក្នុងរវាងជាង ៤០ ប្លាយឆ្នាំហើយ ។

ប៉ុន្តែ យើងសូមបញ្ជាក់ថា ការបោះពុម្ពគ្រានេះ យើងរៀបចំប្លែកបន្តិចពីច្បាប់ដើមគឺ ៖

១-តួអក្សរយើងប្តូរមកជាតួល្អិតវិញ ហើយមានកែទំព័រត្រង់ណាមានចំណងជើងមួយសន្ទឹកផ្សេង យើងក៏ទាញយកមកដាក់ភ្ជាប់ពីលើអត្ថបទ

តែម្តង ។

២-ចំពោះរូបភាព តាំងអស់ យើងពុំបានបោះឡើងវិញទេ ព្រោះរូបតាំងនោះចាស់ជ្រុលពេក ហើយព្រិល ៗ មិនសូវច្បាស់ យើងពុំអាចយកមកធ្វើពុម្ពជាថ្មីបាន ។

៣- មានអត្ថបទរឿងមួយ ដែលមានចុះផ្សាយកាលនោះ ប៉ុន្តែឥឡូវ យើងពុំបានបោះឡើងវិញទេ គឺ ៖

" គតិលោក របស់ ឧកញ៉ា សុត្តន្តប្រីជា ឥន្ទ " ។ ហេតុបានជាពុំបានបោះផ្សាយឡើងវិញ ព្រោះយល់ថា ក្នុងឆ្នាំនោះ អត្ថបទនេះឯង ក៏ពុំបានចុះផ្សាយចប់ដែរ ហើយវិជ្ជាឋានពុទ្ធសាសនបណ្ឌិត្យក៏បានយកអត្ថបទរឿងនេះ មកបោះពុម្ពជាសៀវភៅរួចស្រេចជាក់ជាវជាយូរឆ្នាំមកហើយផង ។ ម្ល៉ោះហើយ អ្នកស្រាវជ្រាវពុំពិបាកនឹងរកទេ ។

ចំណែកពាក្យពេចន៍ និងឃ្លាល្បះ ជាសំនួនវោហាររបស់អ្នកនិពន្ធ យើងឥតប៉ះពាល់ឡើយ ទុកនៅតាមលក្ខណៈដើមតាំងស្រុង គ្រាន់តែតម្រូវអក្ខរាវិរុទ្ធ តាមបែបប្រើសព្វថ្ងៃ តែប៉ុណ្ណោះ ។

ដូច្នេះ វិជ្ជាឋានពុទ្ធសាសនបណ្ឌិត្យ សង្ឃឹមថា សៀវភៅនេះ នឹងផ្តល់មធ្យោបាយងាយស្រួល មួយផ្នែកធំ ចំពោះអ្នកសិក្សាស្រាវជ្រាវជាមិនខាន ។

ភ្នំពេញ ថ្ងៃទី ២០ កុម្ភៈ ១៩៧០

អ្នកប្រមូលរូបរួមបោះពុម្ព

**លី-ធាមតេង**

# បញ្ជីរឿង

# សេចក្ដីអធិប្បាយអំពីផលប្រយោជន៍នៃទស្សនាវដ្ដី
# របស់ព្រះអង្គម្ចាស់ក្រុមព្រះ នរោត្តម ភាណុវង្ស

---

ក្រុងភ្នំពេញ នៅថ្ងៃច័ន្ទ ១០ កើតខែចេត្រ ឆ្នាំថោះ នៅក្នុងអដ្ឋស័ក ពុទ្ធសករាជ ២៤៦៩ ត្រូវនឹងថ្ងៃ ១១ ខែអាព្រីល ឆ្នាំ ១៩២៧ ។

អំពីផលប្រយោជន៍នៃទស្សនាវដ្ដីកម្ពុជសុរិយា របស់ព្រះរាជបណ្ណាល័យ ក្រុងកម្ពុជាធិបតី ។

តាំងពីបោះទស្សនាវដ្ដីកម្ពុជសុរិយាមកដល់ឥឡូវនេះចូលក្នុង ឆ្នាំគម្រប់ ២ ហើយ ឃើញមានប្រយោជន៍ច្រើន ដោយសេចក្ដីដែលថ្លែងទាំងអស់ សឹងតែពិរោះជាចំណេះជាដំណឹងផ្សេង ៗ អាចនាំឲ្យចម្រើន តម្រិះប្រាជ្ញា អ្នកទាំងឡាយ ដែលមានសេចក្ដីព្យាយាមមើល ហើយបណ្ដាលឲ្យអ្នកទាំងពួងមានចំណង់ខំគិត តាក់តែងសេចក្ដីគ្រប់ជំពូកពីអតីតនិងបច្ចុប្បន្ន សម្ដែងឡើងឲ្យគេបានយល់ក្ដី ចូលជួយជាចំណេះ ជាតម្រិះ ជាគំនិតគិតការផ្សេង ៗ ដោយសុចរិតឲ្យបានសម្រេចដូចសេចក្ដីប្រាថ្នា ដោយហេតុថា ចេះល្អជាងមិនចេះ ហើយស្រុកយើងតាំងពីបានប្រូតិកតូរ៉ាតបារាំង វិសេសជាអាណាព្យាបាលជាទីពឹង ក៏បានចេះដឹងលឿនទៅមុខឥតអាក់ យើងគ្រប់គ្នាត្រូវតែយកចិត្តទុកដាក់ខំធ្វើការរបរ និងតាក់តែងសេចក្ដីតាម ចំណេះចេះដឹងជូនមកបោះពុម្ពក្នុងទស្សនាវដ្ដី កម្ពុជសុរិយា ឲ្យច្រើនកុំឲ្យ

ធ្វេសប្រហែស ហើយឲ្យសង្ហាតរៀនសូត្រមើលជានិច្ច ឲ្យចម្រើនផល ប្រយោជន៍ឲ្យកាន់តែច្រើនបរិបូណ៌ឡើង ជាប្រយោជន៍ផ្ទាល់ខ្លួនយើងនិង ស្រុកយើង ជាតិយើង ដែលមានពូជពីបុរាណ បេះសាងដល់ទៅប្រាសាទ មានក្បាច់របនា សុទ្ធសឹងសិលានៅជាចារឹកព្រះនគរ សព្វថ្ងៃនេះស្រាប់ ។

ចូរអ្នកទាំងឡាយស្វែងរកសេចក្ដីល្អ ដោយនូវចូលចិត្តទិញសៀវភៅ ទស្សនាវដ្ដីកម្ពុជសុរិយា យកទៅមើលឲ្យច្រើនឡើងទៀត ព្រោះជាពន្លឺឲ្យ ស្វាងវង្វេងក្នុងសន្ដានចិត្ត ហើយឲ្យនាំគ្នាចូលមកឲ្យរឿយ ៗ មើល សាស្ត្រានិងសៀវភៅជារឿងក្បួនខ្នាត និងនមស្ការព្រះពុទ្ធរូបដែលមាន តម្កល់ទុកជាច្រើន ក្នុងព្រះរាជបណ្ណាល័យ ក្នុងក្រុងភ្នំពេញ ដើម្បីឲ្យញ៉ាំងនឹង តាំងចិត្តជាបរិសុទ្ធឲ្យបានសម្រេចកុសលសីលទាន នូវមគ្គផលគ្រប់ប្រការ ទៅអនាគត ។

ក្រុមព្រះនរោត្តម ភាណុវង្ស ទីអគ្គមហាសេនាធិបតីសិរីអង្គរក្ស
សមុហនាយកអធិបតី ក្រុមប្រឹក្សារាជការព្រះរាជបណ្ណាល័យ



# សេចក្តីអធិប្បាយ

## របស់អ្នកស្រី ការប៉ុឡេស អំពីរូបព្រះមៃត្រីយពោធិសត្វ ដែលតាំងនៅក្នុងព្រះរាជបណ្ណាល័យ

## អំពីរូបមេត្រីយពោធិសត្វប៉ែកខាងមហាយាន

យើងគិតឃើញថាជាការមានប្រយោជន៍ គួរតែអធិប្បាយអំពីបែបភាពសណ្ឋានរូបខ្លះឬរបស់អ្វីខ្លះ ដែលជារបស់ល្អហើយក្រដែលមាននៅក្នុងព្រះរាជបណ្ណាល័យ ដើម្បីឲ្យអស់អ្នកទស្សនាដែលគ្មានឱកាសនឹងចូលទៅមើលព្រះរាជបណ្ណាល័យ បានដឹងស្គាល់គ្រប់គ្នា ។

ពេលនេះ យើងចាប់ផ្តើមពណ៌នារៀបរាប់អំពីរូប ១ ដែលលោកគ្រូវត្តអំពិលទឹក ក្នុងខេត្តកំពង់ឆ្នាំង បានធ្វើអំណោយដល់ព្រះរាជបណ្ណាល័យ កាលពីឆ្នាំ ១៩២៦ រូបនេះជាបែបចម្លាក់ខ្មែរដ៏ប្រសើរ ឆ្លាក់ធ្វើដំណាងពោធិសត្វ ១ អង្គ ក្នុងពុទ្ធសាសនាប៉ែកខាងមហាយាន ហើយដែលក្រឃើញមានក្នុងស្រុកខ្មែរណាស់ ។

រូបនេះមានកម្ពស់ ២៨ សង្ទីម៉ែត្រ ធ្វើពីសម្រិទ្ធពណ៌បៃតងចាស់ ចាំងពន្លឺសម្បុរភ្លាត ពោធិសត្វនោះឈរមានដៃ ៤ តាមពិនិត្យបែបដែលគេរចនានោះ ឃើញថារូបនោះមានរង់មុខមូល ចង្កាតូច, បបូរមាត់ក្រាស់ ច្រមុះតូច, ផ្នត់ក ៣ ជាន់ ស្លាបូលាយលែងខ្លួនទទេ មានសំពត់

ស្លៀកយ៉ាងខើប ពីចង្កេះមកត្រឹមពាក់កណ្ដាលភ្លៅ នាំឲ្យស្គាល់ច្បាស់ ថាជាបែបរចនាខ្មែរសុទ្ធ ដែលគេបានចាប់ធ្វើក្នុងគ្រា ដែលសាងប្រាសាទនៅអង្គរ គឺក្នុងកាលដែលគេចាប់សាងប្រាសាទយ៉ាងល្អ ។

បើមើលរូបនោះឲ្យជាក់ទៅ គេនឹងប្រទះឃើញដៃ ៦ ខាងលើនោះលើកឡើង ហើយម្រាមដៃនោះធ្វើនូវវិតកិមុទ្រសញ្ញា ហើយឯដៃ ២ ខាងក្រោមលា ម្រាមផ្សារឡើងហុចទៅខាងមុខ ធ្វើនូវវរមុទ្រសញ្ញា (យើងមានសេចក្ដីស្ដាយណាស់ ព្រោះរូបនោះកំបុតដៃស្ដាំបាត់ ) ។

នៅគ្រប់បាតដៃទាំងអស់ មានកងចក្រទំហំផ្សេង ៗ គ្នា ហើយទៅកណ្ដាលកងចក្រនោះ មានគ្រឿងសម្គាល់ផ្សេង ៗ សម្រាប់កងចក្រនោះ ។

គេសម្គាល់ឃើញម្យ៉ាងទៀត ថារូបថតនោះមានពុកចង្កាដុះព័ទ្ធតាំងពីជើងសក់ទាំងសងខាង ទៅជួបគ្នានៅក្រោមបបូរមាត់ក្រោម ហើយនៅបបូរមាត់លើមានពុកមាត់យ៉ាងស្ដើង ចុងទាំងសងខាងរាត់ឡើងលើ ឯភ្នែកទាំង ២ ដែលមានរាងដូចជាខ្ទនត្រីនោះ ឃើញនៅជាប់ថ្នាំខ្មៅនៅប្រស្រី និងថ្នាំសនៅកៀនវង់ភ្នែកនៅឡើយ ឯត្របៀកទាំង ២ នោះមានចុងយារ ហើយចោះធ្លុះហើយ ឯសក់នោះព័ទ្ធគួចជាផ្នួងឡើងទៅលើរាងដូចកំពូលមកុដតាល ហើយរចនាជាថ្នាក់ ៤ ជាន់ នៅចំពាក់កណ្ដាលពីខាងមុខនៃផ្នួងនោះ មានឆ្លាក់ជាចេតិយតូច ១ តម្កល់លើផ្កាឈូក តែ

ឃើញមានគ្រឿងអលង្ការក្រោយនេះហើយ បានជាគេអាចនឹងស្គាល់បាន ថារូបនេះធ្វើតំណាងអ្វី ។ គឺជារូបមេត្រិយពោធិសត្វនេះហើយ បានជាគេដឹងថា កាលពីពុទ្ធសករាជ ១៩៤០ នោះ ស្តេចស្រុកលង្កាបានសាងរូបពោធិសត្វនេះ ១ អង្គយ៉ាងធំ ។

ពោធិសត្វនេះហើយជាតួអង្គព្រះពុទ្ធជាន់ក្រោយ គឺព្រះពុទ្ធដែលមានមហាករុណា ដែលមានសម្តែងក្នុងគម្ពីរហីនយានជាភាសាបាលី ទាំងក្នុងគម្ពីរមហាយានជាភាសាសំស្ក្រឹត ថាពោធិសត្វនេះ នឹងចុះមកត្រាស់ក្នុងជម្ពូទ្វីប ជាក្រោយព្រះពុទ្ធអង្គបរិនិព្វានទៅកន្លង ៥០០០ ឆ្នាំ ក្នុងគ្រាឥឡូវលោកនៅ ។ ឋានតុសិតដែលលោកបានសិក្សាផ្ទាល់ អំពីពុទ្ធទស្ស ព្រះពោធិសត្វ លោកតែងមើលមើល ហើយជួយទ្រទ្រង់មនុស្សលោក ឲ្យបានសេចក្តីសុខ ព្រមទាំងឧបត្ថម្ភនូវធម៌អាថ៌ទាំងប៉ុន្មាន ដែលព្រះពុទ្ធបានសម្តែង ឲ្យគង់នៅ ។

ឯចេតិយដែលនៅ ។ ផ្ទង់សក់នោះ ជាតំណាងនៃចេតិយដែលមានសពព្រះកស្សបនៅក្នុងនោះ ហើយចេតិយនោះនឹងបើកឯងនៅវេលាដែលព្រះអរិយមេត្រិយយាងចុះមកក្នុងលោក ដើម្បីឲ្យព្រះកស្សបបានថ្វាយនូវសង្ឃាដី ។



# អនុត្តរិយសុត្ត

## ព្រះអង្គម្ចាស់ សុធារស បានរៀបរៀងមកជាសម្រាយសុទ្ធ

---

## ពណ៌នាប្រារព្ធ

អនុត្តរិយសុត្តនេះ ជាពុទ្ធដីកា អញខ្ញុំបានឃើញបែបបុរាណបណ្ឌិតលោកប្រែមកអំពីមគធភាសា ប្រែជាប្រយោគមានបាលីផងសម្រាយផងចម្រុះគ្នា ដែលលោកតែងមកដូច្នេះនោះ ក៏ជាការប្រពៃដើម្បីឲ្យអ្នកបរិយត្តិស្គាល់ប្រយោគ, តែអញខ្ញុំយល់ឃើញថាដែលបុរាណចារ្យលោកតែងមកនោះ ចំពោះដល់តែអ្នករៀនឲ្យយល់សព្ទ មិនជាទីសណ្ដាប់ដល់អ្នកដែលមិនរៀនព្រះត្រៃបិដក, ហេតុនេះទើបអញខ្ញុំយកមករៀបរៀងទៀតជាសម្រាយស្នោះ ដើម្បីឲ្យអស់សាធុជនបុរស-ស្ត្រីដែលមិនស្គាល់បាលី មើលយកសេចក្ដីបានងាយ ទើបបញ្ជូនរឿងនេះមកទុកជាសម្បត្តិក្នុងព្រះរាជបណ្ណាល័យ ជាទីទស្សនាការបណ្ដាជនានុជន ដែលមកប្រជុំសន្និបាតមើលរឿងផ្សេងៗដើម្បីបម្រុងសតិបញ្ញាឲ្យជ្រះថ្លា ក្នុងព្រះបវរពុទ្ធសាសនា តទៅ ។

សទ្ធារសោ ធានុធាសកោ



# អនុត្តរិយសុត្ត

## អង្គុត្តរនិកាយ ឆក្កនិបាត

---

នមោ តស្ស ភគវតោ អរហតោ សម្មាសម្ពុទ្ធស្ស

អញ្ញុំសូមនមស្ការ សម្តេចព្រះដ៏ទ្រង់ព្រះភាគដែលទ្រង់ឆ្ងាយចាកកិលេសហើយ ត្រាស់ជ្រាបនូវញេយ្យធម៌ទាំងពួងដោយព្រះអង្គឯង ។

សូមសម្តែងអនុត្តរិយសុត្ត សឹងមានពាក្យព្រះបាលីថា ឯវម្មេ សុត្តំ ឯកំ សមយំ ភគវា ជាដើម អត្ថាធិប្បាយប្រែស្រាយជាសេចក្តីថា មានកាលសម័យមួយ សម្តេចព្រះបរមលោកនាថសាស្តា-ចារ្យទ្រង់គង់សម្រាន្តឥរិយាបថ ក្នុងព្រះជេតវនជាអារាម អនាថបិណ្ឌិកគហបតីសាងថ្វាយជិតព្រះនគរសាវត្ថី សម័យនោះសម្តេចព្រះបរមជិនស្រីទ្រង់មានព្រះពុទ្ធតម្រាស់ត្រាស់ប្រាប់ពួកភិក្ខុទាំងឡាយថា ភិក្ខវេ ម្នាលភិក្ខុទាំងឡាយ កិច្ចគឺ អនុត្តរិយ មាន ៦ ប្រការដែលគ្មានកិច្ចដទៃប្រពៃលើសជាកិច្ចអ្វីខ្លះនោះគឺ ៖

១– កិច្ចមើលឃើញអ្វី ដែលជាប្រពៃក្រៃលែង មើលវត្ថុផងទាំងពួង

២– ស្តាប់អ្វីដែលជាប្រពៃក្រៃលែង សម្លេងផងទាំងពួង,

៣– បានរបស់ដែលជាប្រពៃក្រៃលែង បានវត្ថុផងទាំងពួង,

៤- សិក្សាអ្វីដែលជាប្រពៃក្រៃលែង ផ្លូវសិក្សាទាំងពួង,

៥– បម្រើអ្វីដែលជាប្រពៃក្រៃលែង ឬបុគ្គលផងទាំងពួង,

៦– សេចក្តីរឭកនឹកដល់អ្វីដែលជាប្រពៃក្រៃលែង រឭកដល់តែទាំងពួង,

កាលសម្តេចព្រះពុទ្ធអង្គទ្រង់មានព្រះតម្រាស់ ដោយឧទ្ទេសដូច្នេះហើយ ទើបទ្រង់សម្តែងឲ្យច្បាស់ត្រចះក្នុងវិសជ្ជនា ជាវិត្ថារ ពិស្តារថាដូច្នេះ ៖

ភិក្ខវេ ម្នាលភិក្ខុទាំងឡាយ បុគ្គលឯណាក្នុងលោកនេះ បានទស្សនាមើលឃើញតែទាំងពួង គឺដំរីកែវ សេះកែវ ដួងកែវមណី នូវតែដ៏ឧត្តមវិសេសខ្ពស់ ដែលជាចម្លែក ប្លែកក្អែក គួរគ្រេកគ្រអាលក្តី ឬមើលឃើញសមណព្រាហ្មណ៍ ដែលប្រព្រឹត្តិប្រតិបត្តិខុសក្តី ឬ ល្បែងទាំងពួងក្តី សូម្បីបុគ្គលបានមើលឃើញទាំងលំបាកនេះ ហើយមានសោមនស្សមនោរម្យ រីករាយសប្បាយចិត្តដែលបានមើលឃើញដូច្នេះ តថាគតមិនទុកថាបានមើលឃើញដោយប្រពៃ ចាត់ទុកថាបានមើលឃើញដោយទន់ទាប ជារបស់អ្នកស្រុកបុថុជ្ជន ញុំាងកិលេសឲ្យក្រាស់ មិនជារបស់ព្រះអរិយៈ មិនជាកិច្ចប្រកបនូវប្រយោជន៍ មិនប្រព្រឹត្តទៅនូវសេចក្តីរលត់នូវសេចក្តីរលត់នូវកិលេសមានរាគជាដើម មិនជាទីត្រាស់ដឹង មិនជាទីរលត់ ឲ្យប្រាសចាកកងទុក្ខ នូវព្រះនិព្វាន ។

បើបុគ្គលឯណាមានចិត្តចង់មើលចង់ឃើញ ដោយសេចក្តីជ្រះថ្លា

ស្នេហានិងតថាគតនូវសាវកតថាគត បុគ្គលនោះឈ្មោះហៅថាមានកិច្ច បានឃើញដោយប្រពៃ ព្រោះហេតុដែលជ្រះថ្លាជឿជាក់ក្នុងគុណព្រះពុទ្ធ នូវគុណព្រះអរិយសាវក នោះនឹងនាំឲ្យមានសទ្ធាពុះពារកាប់កាត់ នូវកង កិលេសព្រាស់ចាកសន្តាន មិនបានសោយសោកទុក្ខទោមនស្ស និង បានដល់នូវអរិយមគ្គ នូវព្រះនិព្វានជាទីបរមសុខសូន្យចាកទុក្ខ តថាគត ចាត់ទុកជាកិច្ចបានឃើញដោយប្រពៃ គ្មានអ្វីប្រសើរលើសឈ្មោះហៅថា ទស្សនានុត្តរិយ ជាកិច្ចទី១ ។

ភិក្ខវេ ម្នាលភិក្ខុទាំងឡាយ បុគ្គលឯណាក្នុងលោកនេះបានសវនា-កាស្តាប់សព្ទសម្លេងផងទាំងពួងមាន សម្លេងច្រៀងនូវតូរ្យតន្ត្រីជាដើម, ពោះបើបុគ្គលនោះស្តាប់សព្ទសម្លេងយ៉ាងឯកពិរោះចម្លែកប្លែក ត្រចៀកក្តី ឬ ស្តាប់ពាក្យសមណព្រាហ្មណ៍ឯណាដែលបដិបត្តិខុសពុំត្រឹមត្រូវក្តី សូម្បីបុគ្គល នោះបានស្គាល់សព្ទសម្លេងទាំងអម្បាលនេះ គ្រេកគ្រអាល សោមនស្ស ស្រស់រីករាយសប្បាយជាបំផុត តថាគតមិនចាត់ថាជាប្រពៃ ចាត់ទុក ជាសេចក្តីបានស្តាប់ដោយទន់ទាប ជារបស់អ្នកស្រុកបុថុជ្ជនដ៏ក្រាស់ ទៅដោយកិលេស មិនជារបស់ព្រះអរិយៈ មិនជាកិច្ចដ៏ប្រកបដោយ ប្រយោជន៍ មិនជាទីប្រព្រឹត្តទៅរំលងនឿយណាយ កាត់កំចាយកងកិលេស បានដល់នូវព្រះនិព្វានជាទីបរមសុខដ៏ប្រសើរ ។

តែថាបើបុគ្គលឯណាមានចិត្តជ្រះថ្លាប្រុងផ្ចង់តម្រង់ចិត្តស្តាប់របស់ព្រះ

សទ្ធម្មគឺព្រះពុទ្ធវចនៈនូវសាវកសុភាសិត ជាពាក្យសិស្សព្រះសម្មាសម្ពុទ្ធ តថាគតតាំងទុកថាជាកិច្ច ដែលស្តាប់ដោយប្រពៃ ត្បិតបុគ្គលដែលមានសេចក្តីចង់ស្តាប់ តាំងចិត្តតាំងចង់ត្រងសោតព្រះសទ្ធម្មដោយចិត្ត ជឿក្នុងវត្តប្រតិបត្តិ បុគ្គលនោះគង់កាប់កាត់នូវកងកិលេសប្រាសចាកសោយសោករង់ទុក្ខទោមនស្ស នឹងដល់នូវព្រះអរិយមគ្គ និងព្រះនិព្វានជាប្រាកដ បានជាតថាគតពោលថា ស្តាប់ព្រះធម៌នេះ ជាប្រពៃគ្មានអ្វីជាប្រសើរលើស ឈ្មោះហៅថា សវនានុត្តរិយ ជាកិច្ចទី ៦ ។

ភិក្ខវេ ម្នាលភិក្ខុទាំងឡាយ បុគ្គលឯណាក្នុងលោកនេះបានលាភ បានបុត្រក្តី ភរិយាក្តី វត្ថុក្តី ទោះបីវត្ថុនោះជាអវិញ្ញាណក្តី មានវិញ្ញាណក្តី ល្អថ្លៃ តម្លៃវិសេសក្តី ឬមានលាភបានប្រសប់គប់នឹងសមណនូវព្រាហ្មណ៍ ដែលប្រព្រឹត្តបដិបត្តិ សុខក្តី សូម្បីបុគ្គលនោះ បានប្រកបដោយលាភដូច្នេះជាមនុស្សត្រេកអរសប្បាយចិត្តឥតទាស់ តថាគតក៏មិនយល់ថាជាប្រពៃជាត់ទុកជាលាភយ៉ាងទន់ទាបជារបស់អ្នកស្រុកបុថុជ្ជន មិនមែនជាលាភព្រះអរិយៈមិនមែនជាប្រយោជន៍ ដើម្បីនូវសេចក្តីនឿយណាយប្រាសចាកកិលេសក្នុងសន្តានឲ្យបានដល់នូវព្រះនិព្វាន ជាបើបុគ្គលឯណាមានលាភមានភ័ព្វ បានគប់គព្វប្រសព្វនឹងសម្តេច ព្រះបរមសាស្តាចារ្យ ឬសាវកអង្គឯណា ហើយមានចិត្តជ្រះថ្លាជឿក្នុងវត្តសមាបដិបត្តិ កម្ចាត់កងកិលេសគ្មានសេសសល់ប្រាសចាកកងទុក្ខទោមនស្ស សោយសោកបុគ្គល

នោះចំពោះជាទីដ៏បានអរិយមគ្គនូវព្រះនិព្វានជាប្រាកដ តថាគតបានទុកជា
ប្រពៃក្នុងលោកក្តីប្រសើរលើសឈ្មោះហៅថា លាភានុត្តរិយ ជាកិច្ច
ទី ៣ ។

ភិក្ខវេ ម្នាលភិក្ខុទាំងឡាយបុគ្គលឯណាក្នុងលោកនេះបានសិក្សា
នូវសិល្បសាស្ត្រគឺសិក្សាវិជ្ជាដំរី សិក្សាវិជ្ជាសេះ សិក្សាវិជ្ជាធ្វើរថ សិក្សា
វិជ្ជាខាងបាញ់ សិក្សាវិជ្ជាហាត់រៀនអាវុធទាំងពួង ឬមានគម្រិះបេះដឹង
សព្វសារពើគ្តី ឬបានសិក្សាធម៌ក្នុងលទ្ធិសមណព្រាហ្មណ៍ ដែលបដិ-
បត្តិសេចក្តីសុខ សូម្បីបុគ្គលនោះ បានលាភយសខ្ពស់មាំមួន ដោយ
ហេតុដែលបានពីព្រោះវិជ្ជាផ្សេងៗនោះក្តី តថាគតមិនទុកជាប្រពៃ ត្បិត
ឃើញថាជាចំណេះទន់ទាប ជាចំណេះរបស់អ្នកស្រុកបុថុជ្ជនក្រាស់ដោយ
កិលេសមិនមែនជាចំណេះវិជ្ជារបស់ព្រះអរិយៈ មិនមែនជាកិច្ចប្រកបដោយ
ប្រយោជន៍មិនមែនជាទីកម្ចាត់ទាត់កំចាយកាមកិលេសឲ្យស្តើង ។

បើបុគ្គលឯណាបានសិក្សានូវ សីលសិក្ខា ចេត្តសិក្ខា
បញ្ញាសិក្ខា ឆ្លាតឆ្នុះឆ្នុះយល់វិន័យញៀយធម៌ទាំងពួង អាចលួង
កាត់បំណងកងកិលេសឲ្យលត់ តថាគតពោលថាជាកិច្ច សិក្សាដ៏
ប្រពៃគ្មានអ្វីប្រសើរជាង រួចនូវសេចក្តីទុក្ខទល់ក្តុល់ ទោមនស្សសោយ
សោក បានដល់ត្រូវព្រះអរិយមគ្គនូវព្រះនិព្វាន ឈ្មោះហៅថា សិក្ខា
នុត្តរិយ ជាកិច្ចទី ៤ ។

កិច្ចាវេ ម្នាលភិក្ខុទាំងឡាយ បុគ្គលឯណាក្នុងលោកនេះដែលបានបម្រើបរមក្សត្រខត្តិយត្រកូលក្តី ឬបានបំរើសេនាបតី សេដ្ឋីគហបតីនូវជនានុជនធំតូចទាំងពួងក្តី ឬបានបម្រើសមណនូវព្រាហ្មណ៍ដែលប្រព្រឹត្តខុសពាស់ទឹងផ្លូវសមាបដិបត្តិក្តី សូម្បីបុគ្គលនោះបានលាភយសឧត្តមខ្ពស់ព្រោះបម្រើ តថាគតក៏មិនសរសើរថាជាប្រពៃឃើញថាជាផ្លូវបម្រើដោយទំនាប ជារបស់អ្នកស្រុកបុថុជ្ជនដែលធ្ងន់ដោយកិលេស មិនជាផ្លូវបដិបត្តិរបស់ព្រះអរិយៈ មិនជាទីរលត់ទុក្ខពោលគឺព្រះនិព្វាន ។

តែថាបើបុគ្គលឯណា មានចិត្តជ្រះថ្លាស្នេហាតថាគតនិងព្រះសាវក ដែលជាសិស្សានុសិស្សតថាគតឯណា ១ ហើយចូលមកបម្រើឲ្យប្រើជាឧបដ្ឋាកពុំគិតលំបាកនឿយកាយចំខ្វល់ខ្វាយ ដើម្បីបដិបត្តិយកពាក្យប្រដៅកម្ចាត់បង់នូវឧបកិលេស កុំឲ្យសេសសល់បានដល់ព្រះអរិយមគ្គនូវវិបត្តិផុតចាកទុក្ខទោមនស្សសោយសោក មានព្រះនិព្វានជាទីរលត់ទុក្ខ តថាគតហាត់ថាជាកិច្ចបម្រើដ៏ប្រពៃ គ្មានអ្វីប្រសើរលើស ឈ្មោះថាចារិចរិយានុត្តរិយ ជាកិច្ចទី ៤ ។

កិច្ចាវេ ម្នាលភិក្ខុទាំងឡាយ បុគ្គលឯណាក្នុងលោកនេះមានចិត្តរឭកដល់លោកទាំងពួងគឺ បុត្រក្តី ភរិយាក្តី ទោះយោបីវត្ថុនោះមានវិញ្ញាណក្តី ឥតវិញ្ញាណក្តី ឬនឹករឭកដល់សមណៈនូវព្រាហ្មណ៍ ដែលប្រព្រឹត្តគិតខុសពុំត្រង់ត្រូវជាផ្លូវ មិច្ឆាទិដ្ឋិក្តី សូម្បីបុគ្គលនោះនឹកដល់ហើយបានរំខាន

នាំមកនូវសេចក្ដីក្សាន្តចិត្តឥតកង្វល់ នោះគេថាគេក៏មិនយល់ថាជាប្រពៃ ឃើញថាដែលនឹករឭកដល់ដូច្នេះនេះជាធម្មតា អ្នកស្រុកពុំជួនប្រកបនូវកិលេសជាកិច្ចដ៏ទន់ទាប មិនជាកិច្ចរបស់ព្រះអរិយៈ មិនជាទីកម្ចាត់បង់នូវរាគៈ ទោសៈ មោហៈ បើបុគ្គលឯណាមានចិត្តជ្រះថ្លាជឿជាក់ក្នុងព្រះព្រះសម្មាសម្ពុទ្ធ ហើយមានមនោនឹករលឹកដល់ព្រះបរមពុទ្ធាធិគុណនូវព្រះសាវក ជាអ្នកប្រព្រឹត្តដោយប្រពៃអ្នកប្រព្រឹត្តដោយប្រពៃ ត្រឹមត្រូវ ទើបចាត់ជាផ្លូវសមាសតិដែលនាំបញ្ញាឲ្យមុតថ្លាអាចកាប់ផ្ដាក់រាគាទិកិលេសគ្មានសល់ បានដល់នូវព្រះអរិយមគ្គ មានព្រះនិព្វានជាបរិយោសានបាននូវបរមសុខ សេចក្ដីទុក្ខទោមនស្សសោយសោកក៏រលត់ គេថាគេបាត់ទុកថាជាកិច្ចដ៏ប្រសើរ គ្មានសេចក្ដីដែលរឭកនឹកដល់អ្វីប្រពៃលើស ឈ្មោះហៅថា អនុស្សតានុត្តរិយ ជាកិច្ចទី៦ ។

សម្ដេចព្រះពិជិតមារជាអម្ចាស់ ទ្រង់ត្រាស់ទេសនាព្រះសូត្រនេះចប់កាលណា ទើបទ្រង់សម្ដែងនូវនិគមគាថាដូច្នោះ ត្រាស់ថាធម្មជាតិជាបណ្ឌិតតាំងឡាយរមែងទស្សនាការ ដែលត្រូវទស្សនាដ៏ប្រពៃដែលគ្មានដូលីប្រសើរលើស រមែងសវនាការស្ដាប់សព្ទដ៏ប្រពៃដែលគ្មានអ្វីប្រសើរលើស រមែងស្វែងលាភដ៏ប្រពៃដែលគ្មានអ្វីប្រសើរលើស រមែងសិក្សានូវធម៌ដ៏ប្រពៃដែលគ្មានធម៌ដូចដទៃមកលាយឡំ រមែងនៅបម្រើបុគ្គលដ៏គួរសមបម្រើ ដែលគ្មានអ្វីប្រសើរលើស រមែងនឹករឭកដល់បុគ្គលដ៏គួរ

ពួកដែលគ្មានអ្វីប្រសើរលើស រមែងរម្ងាប់ដោយសេចក្តីស្ងប់ស្ងាត់ខំប្រូត កាត់ឲ្យដល់នូវអមតមហានិព្វាន ជាបណ្ឌិតរមែងមានគតិណាស់ក្នុង សេចក្តីមិនប្រមាទ ជាអ្នកសម្រួមនូវឥន្ទ្រិយប្រកបដោយនូវសីល សមាធិ បញ្ញា បច្ចេត្តិ បានលុះនូវធម៌ជាទីរលត់ទុក្ខ ។

ចប់សេចក្តីព្រះពុទ្ធដីកាអនុត្តរិយសូត្រ ដែលទ្រង់សម្តែង ។

ទីនេះថ្លែងអធិប្បាយតាមក្រសែព្រះបរមពុទ្ធោវាទ សូមភាន់ស្រល់ថា នរៈ-ជាតិជនឯណាដែលមានចិត្តជ្រះថ្លាប្រាថ្នាឲ្យដល់នូវនិព្វាន ហើយប្រព្រឹត្តខ្លួនឲ្យមានជាឧបនិស្ស័យ លុះតែប្រកបដោយអនុត្តរិយទាំង ៦ ប្រការ ហើយអាចកាប់ផ្តាច់នូវកិលេស គ្មានសេសសល់ ទើបបានដល់នូវព្រះនិព្វាន តែថាបើមានសេចក្តីប្រមាទមិនខំសង្កត់លះឲ្យជ្រះ នូវកងកិលេស ប្រហែលជាចាំចាស់សិនបុំគិតធ្វើបន្ទុំ បុគ្គលដែលគ្មានអារម្មណ៍ដូច្នេះ ឈ្មោះហៅថាប្រមាទ ត្បិតកិលេសគឺរាគៈ ទោសៈ មោហៈ នេះដែលនឹងបានស្គាល់ស្រាលស្តើង ក៏ចំពោះតែបុគ្គលដែលមានសតិសម្បជញ្ញៈ មានវីរិយៈ គឺព្យាយាមបន្ទោបន៍មិនបន្ធូរថាថ្ងៃណា បុគ្គលដែលមានឧស្សាហ៍ដូច្នេះ ឈ្មោះហៅថាមានសេចក្តីមិនប្រមាទ ឯបុគ្គលដែលបានដល់នូវព្រះនិព្វានជាទីបរមសុខដ៏ប្រសើរនោះ ចំពោះមានតែបុគ្គល ៣ ជំពូក គឺសម្តេចព្រះសម្មាសម្ពុទ្ធ ១ ព្រះបច្ចេកពុទ្ធ ១ ព្រះអរិយសាវកព្រះពុទ្ធ ១ លោកទាំងអម្បាលនេះសុទ្ធតែធ្លាប់បាន គឺព្យាយាមកោសរូសនូវកិលេស

គឺរាគៈ ទោសៈ មោហៈ ជាអនេកជាតិទើបបានសម្រេចមគ្គផលបានដល់នូវព្រះនិព្វាន នឹងបានធ្វើតែម្តងបានក៏ទេ ហេតុនេះគួរតែពួកពុទ្ធសាស-និកជន ដែលជឿជាក់ក្នុងព្រះបវរពុទ្ធសាសនា ហើយមានប្រាថ្នាឲ្យរួចចាកទុក្ខទាំងពួង គួរខំធ្វើសីល សមាធិ បញ្ញាឲ្យហ្មត់ចត់ ទើបបានរលត់ផុតចាកទុក្ខ បើជាពុំអាចធ្វើខ្លួនឲ្យមានឧបនិស្ស័យជាអរិយបុគ្គល រីសេចក្តីទុក្ខទល់តាមខស្សឧបទ្ទវនៃកាយ រមែងមានដល់កាយ មិនចេះផុត បានជាស្តេចព្រះសុគតទ្រង់ត្រាស់ថា បើនរជាតជនឯណាបដិបត្តិតាមពុទ្ធសាសនាពិត ពុំលំអៀងបុគ្គលនោះ ជាទៀងនឹងបានដល់បរមសុខ គឺព្រះនិព្វានដ៏មហាប្រសើរ ពណ៌នាមកជាសង្ខិតកថា ដោយសង្ខេបតែប៉ុណ្ណេះ ។



# រតនត្រយបូជា

## ព្រះគ្រូវិមលបញ្ញា អ៊ុម-ស៊ូរ

អាចារ្យព្រះរាជបណ្ណាល័យកម្ពុជា បានរៀបរៀង

# រតនត្រយបូជា



*រឿងបូជាសក្ការៈដល់ព្រះរតនត្រ័យ និងថ្វាយទេយ្យទានផ្សេង ៗ*

### ថ្វាយសក្ការៈដល់ព្រះពុទ្ធជាម្ចាស់ថា

ឥមិនា សក្ការេន ពុទ្ធំ អភិបូជយាមិ

ខ្ញុំព្រះករុណា សូមបូជាចំពោះនូវព្រះពុទ្ធជាម្ចាស់ ដោយគ្រឿងសក្ការៈ មានប្រមាណប៉ុណ្ណេះ ។

### ថ្វាយសក្ការៈដល់ព្រះធម៌ជាម្ចាស់ថា

ឥមិនា សក្ការេន ធម្មំ អភិបូជយាមិ

ខ្ញុំព្រះករុណា សូមបូជាចំពោះនូវព្រះធម៌ជាម្ចាស់ ដោយគ្រឿងសក្ការៈមានប្រមាណប៉ុណ្ណេះ ។

### ថ្វាយសក្ការៈដល់ព្រះសង្ឃជាម្ចាស់ថា

ឥមិនា សក្ការេន សង្ឃំ អភិបូជយាមិ

ខ្ញុំព្រះករុណា សូមបូជាចំពោះនូវព្រះសង្ឃជាម្ចាស់ ដោយគ្រឿងសក្ការៈមានប្រមាណប៉ុណ្ណេះ ។

# សម្តែងអំពីភត្ត ១៤ ប្រការ

បើឧបាសកឧបាសិកា មានបសាទសទ្ធា គឺសេចក្តីជ្រះថ្លាកើតឡើងក្នុងសន្តាន មានប្រាថ្នា នឹង ថ្វាយនូវភត្តទាំង ១៤ ថ្វាយភត្តប្រការឯណាមួយ ក៏បាន តាមប្រាថ្នា ។

ឯភត្តទាំង ១៤ នោះគឺ ៖

១-សង្ឃភត្ត ថ្វាយនូវភត្តដល់សង្ឃទាំងពួង,

២ ឧទ្ទេសភត្ត ថ្វាយនូវភត្តដល់ភិក្ខុ ១ អង្គ ឬ ២ អង្គ ឬ ៣ អង្គ ជាដើម តាមពាក្យដែលសង្ឃ សម្តែងឲ្យ,

៣-និមន្តនភត្ត ថ្វាយនូវភត្តដល់ភិក្ខុ ដែលខ្លួននិមន្តមកហើយប្រគេន,

៤-សលាកភត្ត ថ្វាយនូវភត្តដល់ភិក្ខុទាំងឡាយ ដែលខ្លួនសរសេរឈ្មោះក្នុងស្លាកហើយចាប់,

៥-បក្ខិកភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃក្នុងសុក្កបក្ស គឺចំណែកខាងខ្នើត ឬកាឡបក្ស គឺចំណែកខាងរនោច តែក្នុង ១ បក្ស ប្រគេនតែ ១ថ្ងៃ មិនមានកំណត់ថ្ងៃណា,

៦ ឧបោសថិកភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃ ក្នុងថ្ងៃឧបោសថកាល,

៧- បាដិបទិកភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃក្នុងថ្ងៃ១កើតឬ១រោច,

៨- អាគន្តុកភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃទើបមកដល់,

៩- គមិកភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃ ដែលមានដំណើរ ទឹង ទៅកាន់ទីណាមួយ,

១០- គិលានភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃដែលមានជំងឺ ។

១១- គិលានុបដ្ឋាកភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃ ជាអ្នករក្សាជំងឺ,

១២- និច្ចភត្ត ថ្វាយនូវភត្តជានិច្ចដល់ភិក្ខុសង្ឃ,

១៣- កុដិភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃនៅទីលំនៅ មានកុដិជាដើម (ភត្តនេះហៅបានតាមឈ្មោះទីកន្លែងដែលសង្ឃនៅ)

១៤- វារភត្ត ថ្វាយនូវភត្តដល់ភិក្ខុសង្ឃ ដោយចាក់ជាវេន ។

ឯភត្តទាំង ១៤ ប្រការនេះ បើទាយកប្រាថ្នានឹងថ្វាយភត្តឯណាមួយ ឲ្យដាក់ឈ្មោះភត្តនោះ ត្រង់បាលីដែលវង់ក្រចកយ៉ាងនេះ ( ) ទុកនោះចុះ ។

នមោ តស្ស ភគវតោ អរហតោ សម្មាសម្ពុទ្ធស្ស (បីចប់) ។

អយំ ភោ ភន្តេ បិណ្ឌបាតោ ធម្មិកោ ធម្មលទ្ធោ ធម្មេនេវ ឧប្បាទិតោ មាតាបិតុអាទិកោ គុណវន្តេ ឧទ្ទិស្ស (ឥត្ថន្នាមំ) សបរិក្ខារំ ពុទ្ធប្បមុខស្ស សំឃស្ស ទេម តេ គុណវន្តានយោ (ឥត្ថន្នាមំ) អត្តនោ សន្តកំ វិយ មញ្ញមានា អនុមោទន្តុ អនុមោទិត្វាន យថិច្ឆិត· សម្បត្តីហិ សមិជ្ឈន្តុ សព្វទុក្ខា បមុច្ចន្តុ ឥមិនានិស្ស· ន្ទេន ទុតិយម្បិ, តតិយម្បិ ។

ប្រែថា បពិត្រព្រះគង្គសង្ឃដ៏ចម្រើនអើយ រីបិណ្ឌបាត នៃយើងខ្ញុំទាំងឡាយនេះ ប្រកបដោយធម៌ បានមកដោយធម៌ កើតឡើងដោយធម៌ យើងខ្ញុំទាំងឡាយ សូមឧទ្ទិសចំពោះដល់លោកអ្នកដ៏មានគុណទាំងឡាយ មានមាតានិងបិតាជាដើម ហើយយើងខ្ញុំទាំងឡាយ (វេរនូវភត្តមានប្រការនេះជាឈ្មោះ) ព្រមទាំងបរិក្ខារដល់ព្រះសង្ឃ មានព្រះពុទ្ធជាប្រធាន សូមលោកអ្នកដ៏មានគុណទាំងឡាយ មានមាតានិងបិតាជាដើមនោះ ចូរសម្គាល់ (នូវភត្តមានប្រការនេះជាឈ្មោះ) ជាដូចជារបស់នៃខ្លួន ហើយចូរអនុមោទនាយកចុះ លុះអនុមោទនារួចហើយ ចូរឲ្យរួចរដោះចាកទុក្ខទាំងពួង ឲ្យបានសម្រេចដោយសម្បត្តិទាំងឡាយ ៣ ប្រការ គឺសម្បត្តិមនុស្ស ១, សម្បត្តិទេវតា ១, សម្បត្តិព្រះនិព្វាន ១

ដោយសមគួរតាមសេចក្តីប្រាថ្នា របស់លោកអ្នកដ៏មានគុណទាំងឡាយនោះចុះ ដោយអំណាចផលានិសង្ស ដែលហូរជូនមកមិនដាច់នេះហោង ។

អស់វារៈ ២ ដងផង, អស់វារៈ ៣ ដងផង ។

(ត្រង់បទថា ឥត្ថន្នាមំ នោះត្រូវបញ្ចូលឈ្មោះកត្តាតាមប្រាថ្នា) ។

## បើថ្វាយចតុបច្ច័យជាសង្ឃទានថាដូច្នេះ

មយំ ភន្តេ ឥមេ ចត្តារោ បច្ចយេ ឥធានេត្វា សំឃស្ស ទេម សាធុ ភន្តេ សំឃោ ឥមេ ចត្តារោ បច្ចយេ បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ, តតិយម្បិ ។

ប្រែថា បពិត្រព្រះគម្តែងសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយ បាននាំនូវបច្ច័យទាំងឡាយ ៤ នេះ មកដំកល់ទុកក្នុងទីនេះ ហើយថ្វាយដល់ព្រះសង្ឃ បពិត្រព្រះសង្ឃដ៏ចម្រើន សូមព្រះសង្ឃទទួលយក នូវបច្ច័យទាំងឡាយ ៤ នេះ ដើម្បីសេចក្តីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។

អស់វារៈ ២ ដងផង, អស់វារៈ ៣ ដងផង ។

## ថ្វាយចតុបច្ច័យដល់ភិក្ខុមួយរូបថាដូច្នេះ

មយំ ភន្តេ ឥមេ ចត្តារោ បច្ចយេ ឥធានេត្វា អាយស្មតោ ទេម សាធុ ភន្តេ អាយស្មា ឥមេ បច្ចយេ

បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ទុតិយម្បិ តតិយម្បិ ។

*ប្រែថា បពិត្រព្រះករុណាម្ចាស់ដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយ បាននាំនូវបច្ច័យទាំងឡាយ ៤ នេះ មកតម្កល់ទុកក្នុងទីនេះ សូមថ្វាយដល់ព្រះករុណាម្ចាស់ដ៏មានអាយុ, បពិត្រព្រះករុណាដ៏ចម្រើន សូមព្រះករុណាទទួលយកនូវបច្ច័យទាំងឡាយនេះ ដើម្បីសេចក្តីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខ ដល់យើងខ្ញុំទាំងឡាយអស់កាលជាអង្វែងទៅហោង ។*

*អស់វារៈ ២ ដងផង, អស់វារៈ ៣ ដងផង ។*

## ថ្វាយកឋិនទានដល់ព្រះសង្ឃថាដូច្នេះ

ឥមំ ទុស្សំ កឋិនចីវរំ សំឃស្ស ទេម ទុតិយម្បិ តតិយម្បិ ។

*ប្រែថា បពិត្រព្រះអង្គសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយសូមថ្វាយនូវសំពត់នេះ ជាសំពត់ដើម្បីកឋិនចីវរ ដល់ព្រះសង្ឃជាម្ចាស់ ។*

*អស់វារៈ ២ ដងផង, អស់វារៈ ៣ ដងផង ។*

## ថ្វាយគ្រឿងបរិក្ខារជាបរិវារកឋិនថាដូច្នេះ

យេនម្ហាកំ កឋិនំ គហិតំ កឋិនានិសំសានិ តស្សេវ ទេម ទុតិយម្បិ តតិយម្បិ ។

ប្រែថា បពិត្រព្រះគម្ពង់សង្ឃដ៏ចម្រើនអើយ រីកឋិនទៃយើងខ្ញុំទាំងឡាយ គឺលោកម្ចាស់អង្គណា បានទទួលកាន់យកហើយ យើងខ្ញុំទាំង-ឡាយ សូមថ្វាយនូវគ្រឿងបរិក្ខារ ជាបរិវារនៃកឋិនទាំងឡាយ ដល់លោកម្ចាស់អង្គនោះឯង ។

អស់វារៈ ២ ដងផង, អស់វារៈ ៣ ដងផង ។

សំពត់ ៧ ប្រការដែលព្រះសម្មាសម្ពុទ្ធទ្រង់អនុញ្ញាតទុកឲ្យ ជាសំពត់សមណបរិក្ខារនោះ គឺសំពត់ត្រ័យចីវរ ១ សំពត់សម្រាប់ងូតទឹកភ្លៀង ១ សំពត់សម្រាប់ទ្រាប់អង្គុយ ១ សំពត់សម្រាប់ក្រាលជាកម្រាល ១ សំពត់សម្រាប់គ្របបូស, គ្របដំបៅ ១ សំពត់សម្រាប់ជូតមុខ គឺកន្សែង ១ សំពត់តូច ឬ ធំជាងប្រមាណហៅថា សំពត់បរិក្ខារចោឡៈ ១ បញ្ចូលសំពត់សម្រាប់ត្រងទឹក ១ សំពត់បំណាំវស្សា ១ និងសំពត់អច្ចេកចីវរ ១ ថែមទៀតជា ១០ ។

សំពត់ទាំង ១០ ប្រការនេះ បើទាយកប្រាថ្នា នឹង ថ្វាយសំពត់ណាមួយដល់ព្រះសង្ឃ តែសំពត់នោះមានតែ ១ ត្រៃ ឬ ១ ផ្ទត់ ត្រូវឲ្យយកឈ្មោះសំពត់នោះជាបាលី ឯកវចនៈ មកដាក់បញ្ចូលវេរ ដូចមានសំណៅទុកខាងមុខនេះ ទាំង ១០ ប្រការ គឺ :

១- ឥមំ តិចីវរំ នូវត្រៃចីវរនេះ ។

២- ឥមំ វស្សិកសាដិកំ នូវសំពត់សម្រាប់ងូតទឹកភ្លៀងនេះ,

៣- ឥមំ និសីទនំ នូវសំពត់សម្រាប់ក្រាលអង្គុយនេះ,

៤- ឥមំ បច្ចត្ថរណំ នូវសំពត់សម្រាប់ក្រាលនេះ,

៥- ឥមំ កណ្ឌុបដិច្ឆាទិ នូវសំពត់សម្រាប់គ្របបូស, គ្របដំបៅនេះ,

៦- ឥមំ មុខបុញ្ឆនចោឡំ នូវសំពត់សម្រាប់ជូតមុខទឹកនៃស្រង់នេះ,

៧. ឥមំ បរិក្ខារចោឡំ នូវសំពត់តូច ឬ ធំជាងប្រមាណជាបរិក្ខារនេះ,

៨- ឥមំ បរិស្សាវនំ នូវសំពត់សម្រាប់ត្រងទឹកនេះ,

៩. ឥមំ វស្សិកសាដិកំ នូវសំពត់ចំណាំវស្សានេះ,

១០- ឥមំ អច្ចេកចីវរំ នូវសំពត់អច្ចេកចីវរនេះ, ។

សំពត់ទាំង ១០ ប្រការនេះ បើគ្រូការនឹងរើសថ្វាយសំពត់ណាមួយ ឲ្យយកឈ្មោះសំពត់ដែលបានសំណៅទុកនោះ មកដាក់ក្នុងបាលីដែលសម្រាប់សូត្រនេះ ត្រង់កន្លែងដែលមានវង់ក្រចកទុកនៅនោះស្រាប់ ។.

មយំ ភន្តេ ឥមំ (តិចីវរំ) សង្ឃស្ស ទេម សាធុ ភន្តេ សង្ឃោ ឥមំ (តិចីវរំ) បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

ប្រែថា បពិត្រព្រះគម្ពងសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយបាន នាំមកនូវ (ត្រ័យចីវរ) នេះ មកតម្កល់ទុកក្នុងទីនេះ សូមថ្វាយដល់ព្រះសង្ឃ បពិត្រព្រះសង្ឃដ៏ចម្រើនអើយ សូមព្រះសង្ឃចូរទទួលយកនូវ (ត្រ័យចីវរ) នេះ ដើម្បីសេចក្តីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។

អស់វារៈ ២ ដងផង, អស់វារៈ ៣ ដងផង ។

សំពត់ទាំង ១០ ប្រការនេះ បើប្រាថ្នានឹងថ្វាយសំពត់ណាមួយដល់ព្រះសង្ឃ តែសំពត់នោះមានច្រើនត្រ័យ ឬ ច្រើនផ្ទត់ ត្រូវឲ្យឈ្មោះសំពត់នោះជាបាលី ពហុវចនៈ មកដាក់បញ្ចូលវេរ ដូចមានសំណៅទុកនៅខាងក្រោមនេះស្រាប់ ។

១.ឥមានិ តិចីវរានិ នូវសំពត់ត្រ័យចីវរទាំងឡាយនេះ,

២ ឥមា វស្សិកសាដិកាយោ នូវសំពត់សម្រាប់ងូតទឹកភ្លៀងទាំងឡាយនេះ,

៣ ឥមានិ និសីទនានិ នូវសំពត់សម្រាប់ក្រាប់អង្គុយទាំង-ឡាយនេះ,

៤. ឥមានិ បច្ចត្ថរណានិ នូវសំពត់កម្រាលទាំងឡាយនេះ,

៥. ឥមានិ កណ្ឌុបដិច្ឆាទីនិ នូវសំពត់សម្រាប់គ្របបូសគ្របដំបៅទាំងឡាយនេះ,

៦-ឥមានិ មុខបុញ្ឆនចោឡានិ នូវសំពត់សម្រាប់ជូតមុខទាំងឡាយនេះ,

៧-ឥមានិ បរិក្ខារចោឡានិ នូវសំពត់បរិក្ខារទាំងឡាយនេះ,

៨-ឥមានិ បរិស្សាវនានិ នូវសំពត់សម្រាប់ត្រងទឹកទាំងឡាយនេះ ។

៩-ឥមា វស្សកសិកាយោ នូវសំពត់ចំណាំវស្សាទាំងឡាយនេះ ។

១០-ឥមានិ អច្ចេកចីវរានិ នូវសំពត់អច្ចេកចីវរទាំងឡាយនេះ,

ឯសំពត់ទាំង ១០ ប្រការនេះ បើត្រូវការនឹងវេរសំពត់ណាមួយឲ្យយកឈ្មោះសំពត់នោះដាក់ក្នុងបាលី សម្រាប់សូត្រវេរខាងមុខនោះចុះ ត្រង់កន្លែងដែលមានវង់ក្រចកនោះស្រាប់ ។

## ថ្វាយសំពត់ងូតទឹកភ្លៀងថា

មយំ ភន្តេ (ឥមា វស្សិកសាដិកាយោ) ឥធានេត្វា សំឃស្ស ទេម សាធុ ភន្តេ សំឃោ (ឥមា វស្សិកសាដិ.កា.យោ) បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

ប្រែថា បពិត្រព្រះគម្ពែងសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយ

បាននាំមកនូវ ( សំពត់សម្រាប់ងូតទឹកភ្លៀងទាំងឡាយនេះ ) មកតម្កល់ទុកក្នុងទីនេះ សូមថ្វាយដល់ព្រះសង្ឃ បពិត្រព្រះសង្ឃដ៏ចម្រើន សូមព្រះសង្ឃចូរទទួលយក នូវ ( សំពត់សម្រាប់ងូតទឹកភ្លៀងទាំងឡាយនេះ ) ដើម្បីសេចក្តីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។

អស់វារៈពីរដងផង, អស់វារៈបីដងផង ។

## ថ្វាយសង្ឃទានបិ

មយំ ភន្តេ ឥមានិ ខាទនីយភោជនីយាទីនិ សេជ្ជត្វា សំឃស្ស ទេម សាធុ នោ ភន្តេ សំឃោ ឥមានិ ខាទនីយ-ភោជនីយាទីនិ បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

ប្រែថា បពិត្រព្រះអង្គសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយ បានតាក់តែងនូវវត្ថុទាំងឡាយមានខាទនីយភោជនីយាហារ គឺបង្អែមនិងចម្អាបជាដើមនេះ ហើយបង្អោនមកថ្វាយដល់ព្រះសង្ឃ បពិត្រព្រះអង្គសង្ឃដ៏ចម្រើន សូមព្រះសង្ឃចូរទទួលយកនូវវត្ថុទាំងឡាយ មានបង្អែមនិងចម្អាបជាដើមនេះ ដើម្បីសេចក្តីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយអស់កាលជាអង្វែងទៅហោង ។

អស់វារៈពីរដងផង, អស់វារៈបីដងផង ។

## ថ្វាយគណទានបាឋ

មយំ ភន្តេ ឥមានិ ខាទនីយភោជនីយានិ សជ្ជេត្វា សីលវន្តានំ ទេម សាធុ ភន្តេ សីលវន្តោ ឥមានិ ខាទនីយភោជនីយានិ បដិគ្គណ្ហន្តុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

*ប្រែថា បពិត្រព្រះករុណាម្ចាស់ទាំងឡាយ ដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយបានតាក់តែង នូវវត្ថុទាំងឡាយមានខាទនីយភោជនីយាហារគឺបង្អែម និង ចម្អាបជាដើមនេះ ហើយបង្អោនមកថ្វាយដល់លោកម្ចាស់អ្នកមានសីលទាំងឡាយ បពិត្រព្រះករុណាម្ចាស់ទាំងឡាយដ៏ចម្រើន សូមលោកម្ចាស់អ្នកមានសីលទាំងឡាយ ចូរទទួលយកនូវវត្ថុទាំងឡាយ មានបង្អែមនិងចម្អាបជាដើមនេះ ដើម្បីសេចក្ដីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្ដីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។*

*អស់វារៈពីរដងផង អស់វារៈបី ដងផង*

## ថ្វាយបាដិបុគ្គលិកទានបាឋ

មយំ ភន្តេ ឥមានិ ខាទនីយភោជនីយានិ សជ្ជេត្វា សីលវតោ ទេម សាធុ ភន្តេ សីលវា ឥមានិ ខាទនី-

យភោជនិយាទីនិ បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

*ប្រែថា បពិត្រព្រះករុណាម្ចាស់ដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយបាន តាក់តែងនូវវត្ថុទាំងឡាយ មានខាទនីយភោជនីយាហារ គឺបង្អែម និងចម្អាប ជាដើមនេះ ហើយបង្អោនចូលមកថ្វាយព្រះករុណាម្ចាស់ បពិត្រព្រះករុណា ម្ចាស់ដ៏ចម្រើន សូមលោកអ្នកមានសីល ចូរទទួលយកនូវវត្ថុទាំងឡាយ មានបង្អែម និងចម្អាបជាដើមនេះ ដើម្បីសេចក្ដីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្ដីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែង ទៅហោង ។*

*អស់វារៈពីរដងផង, អស់វារៈបីដងផង ។*

## ថ្វាយអង្ករហ

មយំ ភន្តេ ឥមានិ តណ្ឌុលានិ ឥធានេត្វា សំឃស្ស ទេម ភន្តេ សំឃោ ឥមានិ តណ្ឌុលានិ បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

*ប្រែថា បពិត្រព្រះគម្ពង់សង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយបាន នាំមកនូវអង្ករទាំងឡាយនេះ មកតម្កល់ទុកក្នុងទីនេះ ហើយសូមថ្វាយដល់ ព្រះសង្ឃ បពិត្រព្រះគម្ពង់សង្ឃដ៏ចម្រើន សូមព្រះសង្ឃចូរទទួលយក*

នូវអង្ករទាំងឡាយនេះ ដើម្បីសេចក្តីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។

អស់វារៈពីរដងផង, អស់វារៈបីដងផង ។

## ថ្វាយផ្លែឈើផ្សេងៗបា

មយំ ភន្តេ ឥមានិ នានាផលានិ ឥធ នេត្វា សំឃស្ស ទេម សាធុ ភន្តេ សំឃោ ឥមានិ នានាផលានិ បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

ប្រែថា បពិត្រព្រះគម្តែងសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយបាននាំមកនូវផ្លែឈើផ្សេងៗទាំងឡាយនេះ មកតម្កល់ទុកក្នុងទីនេះ សូមថ្វាយដល់ព្រះសង្ឃ បពិត្រព្រះគម្តែងសង្ឃដ៏ចម្រើន សូមព្រះសង្ឃប្ដូរទទួលយក នូវផ្លែឈើផ្សេងៗទាំងឡាយនេះ ដើម្បីសេចក្តីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។

អស់វារៈពីរដងផង, អស់វារៈបីដងផង ។

## វេរគ្រឿងសេនាសនៈតទៅ

## បើថ្វាយរោងឧបោសថថា

មយំ ភន្តេ (ឥមំ ឧបោសថាគារំ) ការេត្វា ចាតុទ្ទិសស្ស ភិក្ខុសំឃស្ស ទេម សាធុ ភន្តេ ភិក្ខុសំឃោ (ឥមំ ឧបោសថាគារំ) បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

*ប្រែថា បពិត្រព្រះគម្តែងសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយបាន ចាត់ចែងធ្វើ នូវ (រោងសម្រាប់ធ្វើនូវឧបោសថនេះ) ហើយសូមថ្វាយដល់ ព្រះភិក្ខុសង្ឃដែលមកអំពីទិសទាំង ៤ បពិត្រព្រះគម្តែងសង្ឃដ៏ចម្រើន សូម ព្រះភិក្ខុសង្ឃប្រោទទួលយក នូវ (រោងសម្រាប់ធ្វើនូវឧបោសថនេះ) ដើម្បី សេចក្តីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្តីសុខគ្រប់ប្រការដល់ យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។*

*អស់វារៈពីរដងផង, អស់វារៈបីដងផង ។*

## បើថ្វាយសាលាថា

ឥមំ សាលំ *នូវសាលានេះ ។*

## ថ្វាយកប្បិយកុដិថា

ឥមំ កាប្បិយកុដឹ *នូវកប្បិយកុដិនេះ ។*

## ថ្វាយកុដិតូចបា

ឥមំ កុដឹ នូវកុដិតូចនេះ ។

## ថ្វាយកុដិធំបា

ឥមំ វិហារំ នូវកុដិធំនេះ ។

## ថ្វាយបង្គន់បា

ឥមំ វច្ចកុដឹ នូវបង្គន់នេះ ។

បើប្រាថ្នានឹងវេរសាលាក្តី កប្បិយកុដិក្តី កុដិដ៏តូចក្តី កុដិដ៏ធំក្តី បង្គន់ក្តី ទាំង ៥ យ៉ាងនេះ នឹងថ្វាយរបស់ណាមួយឲ្យយករបស់នោះ ទាំងបាលី ទាំងសម្រាយ មកដាក់ត្រង់កន្លែងដែលវង់ក្រចក ក្នុងបាលីដែលវេរកេង ឧបោសថនោះហើយសូត្រវេរទៅចុះ ។

## ថ្វាយគរុភណ្ឌបា

មយំ ភន្តេ ឥមំ គរុភណ្ឌំ ឥធាទេត្វា ភិក្ខុសំឃស្ស ទេម សាធុ ភន្តេ ភិក្ខុសំឃោ ឥមំ គរុភណ្ឌំ បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

ប្រែថា បពិត្រព្រះគម្ពង់សង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយ

បានទាំមកនូវគរុភ័ណ្ឌនេះ មកតម្កល់ទុកក្នុងទីនេះ សូមថ្វាយដល់ព្រះភិក្ខុ-សង្ឃ បពិត្រព្រះគម្ពែងសង្ឃដ៏ចម្រើន សូមព្រះភិក្ខុសង្ឃប្ដូរទទួលយកនូវគរុភ័ណ្ឌនេះ ដើម្បីសេចក្ដីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្ដីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។

អស់វារៈពីរដងផង, អស់វារៈបីដងផង ។

## វេរគ្រឿងភេសជ្ជៈតទៅ

## បើថ្វាយទឹកឃ្មុំថា

មយំ ភន្តេ ( ឥមំ មធុំ ) ឥធានេត្វា ភិក្ខុសំឃស្ស ទេម សាធុ ភន្តេ ភិក្ខុសំឃោ ( ឥមំ មធុំ ) បដិគ្គណ្ហាតុ អម្ហាកំ ទីឃរត្តំ អត្ថាយ ហិតាយ សុខាយ ។ ទុតិយម្បិ តតិយម្បិ ។

ប្រែថា បពិត្រព្រះគម្ពែងសង្ឃដ៏ចម្រើនអើយ យើងខ្ញុំទាំងឡាយ បានទាំមកនូវ (ទឹកឃ្មុំ) នេះ មកតម្កល់ទុកក្នុងទីនេះ សូមថ្វាយដល់ព្រះភិក្ខុសង្ឃ បពិត្រព្រះគម្ពែងសង្ឃដ៏ចម្រើន សូមព្រះភិក្ខុសង្ឃប្ដូរទទួលយកនូវ (ទឹកឃ្មុំ) នេះដើម្បីសេចក្ដីចម្រើន ដើម្បីជាប្រយោជន៍ ដើម្បីសេចក្ដីសុខគ្រប់ប្រការ ដល់យើងខ្ញុំទាំងឡាយ អស់កាលជាអង្វែងទៅហោង ។

អស់វារៈពីរដងផង អស់វារៈបីដងផង ។

## បើនឹងថ្វាយប្រេងថា

ឥមំ តេលំ នូវប្រេងនេះ ។

## បើថ្វាយទឹកអំពៅថា

ឥមំ ផាណិតំ នូវទឹកអំពៅនេះ ។

## បើថ្វាយទឹកត្នោតថា

ឥមំ តាលោឧកំ នូវទឹកត្នោតនេះ ។

## បើថ្វាយថ្នាំរក្សារោគថា

ឥមំ គិលានភេសជ្ជំ នូវថ្នាំសម្រាប់រក្សានូវមនុស្សឈឺនេះ ។

បើប្រាថ្នានឹងវេរ ប្រេងក្តី ទឹកអំពៅក្តី ទឹកត្នោតក្តី ថ្នាំរក្សានូវជំងឺក្តី ទាំង ៣ នេះ របស់ណាមួយ ឲ្យយកឈ្មោះរបស់នោះ ទាំងបាលី ទាំងសម្រាយ មកដាក់ក្នុងបាលីដែលវេរទឹកឃ្មុំនោះ ត្រង់កន្លែងដែលវង់ក្រចកនោះ ហើយសូត្រវេរទៅចុះ ។

## វិធីដែលវេរចតុបច្ច័យទាំង៤ ប្រការចប់ប៉ុណ្ណោះ ។



# សេចក្ដីដែលអ្នកអង្គម្ចាស់ ទឡ្សឆាយាទខ្យ អធិបតីក្រុមសមាគម បណ្ដាសិស្សានុសិស្សសាលារដ្ឋបាលតុលាការខ្មែរ សូត្រជាភាសាបារាំងនៅវេលាបូជាសព អ្នកអង្គម្ចាស់ សិង្ហរ៉ា ក្រុមការ ជុំ-ម៉ោង ធ្វើរាជការនៅ ព្រះរាជបណ្ណាល័យ ប្រែជាភាសាខ្មែរ

---

សូមក្រាបបង្គំទូលព្រះករុណាជាអម្ចាស់ជីវិតលើត្បូង សូមជម្រាបលោក ឡឺរេស៊ីដង់ សុប៉េរីយ៉ើរ និងអស់លោក អស់អ្នកទាំងឡាយ ទាំងស្រី-ប្រុស ។

តាងនាមក្រុមសមាគមបណ្ដាសិស្សានុសិស្ស សាលារដ្ឋបាល-តុលា-ការខ្មែរ និងតាងនាមមិត្តភក្តិទាំងអស់ ខ្ញុំទទួលកិច្ចមកថ្លែងសេចក្ដីនៅទីនេះ ចំពោះមុខសពអ្នកអង្គម្ចាស់សិង្ហរា គឺដោយមានទុក្ខធំណាស់ ដែលខ្ញុំភ្ជាប់សេចក្ដីស្ដាយរបស់ខ្ញុំជាទីបំផុត ទៅនឹងសេចក្ដីស្ដាយរបស់មិត្តទាំងប៉ុន្មាន ។

អ្នកអម្ចាស់ សិង្ហរានេះ ជាមនុស្សដែលគេចូលចិត្តកល់គ្នា ព្រោះលោកស្រឡាញ់រាប់អានអ្នកតូចនិងអ្នកទាបថោក លោកមានសេចក្ដីប្រាថ្នាតែម្យ៉ាងគឺសម្រាលនូវទុក្ខវេទនារបស់អ្នកក្រខ្សត់ ហើយបានខំឈឺឆ្អាលជ្រោមជ្រែងការជំនួញរបស់ជាតិខ្មែរ តាមកម្លាំងលោកដែលធ្វើបាន ឯកិច្ច

វល់របស់លោកតែម្យ៉ាងនោះ គឺធ្វើឲ្យក្រុងកម្ពុជាបានចំរើនរុងរឿង ឲ្យបណ្ដារាស្ត្របានសេចក្ដីសុខសប្បាយមិនក្រខ្សត់ និងឲ្យបានសេចក្ដីចំរើនដល់ជាតិ ព្រះអម្ចាស់សិហ្នកពង្គបស្ដែង សក្ដិសមពង្សកាយណាស់ មានបែបសណ្ឋានសុខុមាល និងព្រះសពព្រះវរពជបិតា គឺព្រះអង្គម្ចាស់ សុទ្ធា-វង្ស ទីអគ្គមហាសេនាធិបតី ដែលបានធ្វើការដើម្បីប្រសើរតបគុណក្រុងកម្ពុជា និងក្រុងបារាំងសែស ព្រះអង្គម្ចាស់សិហ្ន មានកិរិយាសុភាពរាបសា ពេះកាយនិងអ្នកខ្សត់ខ្សោយ ហើយព្រះហឫទ័យល្អបំផុត ពេញជាកិច្ចរបស់ក្សត្រ ទ្រង់បានធ្វើឲ្យខេមរជាតិទាំងឡាយយល់ច្បាស់ អំពីប្រយោជន៍នៃសេចក្ដីប្រាស្រ័យយ៉ាងមាំនិងគ្នាទៅវិញទៅមក ហើយដោយអំណាចគំនិតត្រង់ និងតម្រិះវិជ្ជារបស់លោកនោះ ទ្រង់បង្កើតបានជាសមាគមច្រើន ។

អ្នកអង្គម្ចាស់សិហ្ន ប្រសូតក្នុងសង្កាត់លេខ ៣ ក្រុងភ្នំពេញ នៅថ្ងៃអាទិត្យ ១១ រោចខែកព្រួបទ ឆ្នាំចសម្រិទ្ធិស័ក ត្រូវនឹងថ្ងៃ ១១ ខែសេបតមឆ្នាំ ១៨៩៨ ជ.ព្រះរាជបុត្រាព្រះអង្គម្ចាស់រាជាវតី នរោត្តម សុទ្ធាវង្ស ទីអគ្គមហាសេនាធិបតី និងអ្នកម្នាងសម្រេច កាលព្រះជន្មបាន៧ខែនោះ ព្រះបាទសម្ដេចព្រះ នរោត្ដម ជាព្រះរាជអយ្យកោ និងព្រះម្នាងឃិបជាអយ្យកា យកទៅបីបាច់ថែរក្សាក្នុងព្រះបរមរាជវាំងតរៀងមក ព្រះអយ្យ-កោ និង អយ្យការំលាយខន្ធទៅ ។

កាលនៅពីកុមារនោះព្រះអយ្យកោ ទ្រង់មេត្តាពន់ពេកណាស់ហើយ អ្នកនគរទាំងប៉ុន្មានដែលបានឃើញ ក៏ស្រឡាញ់គ្រប់គ្នា ។

ទ្រង់បានចូលសិក្សាក្នុងបឋមសាលាបារាំងសែស ហើយខំសង្វាតស្វាធ្យាយ លុះដល់បានថ្នាក់ជាន់ខ្ពស់ ដល់មកក្នុងខែជេស្ឋឆ្នាំ ១៩១៦ ទ្រង់ចូលដេញប្រយោគ បានសញ្ញាបត្រ បឋមសិក្សាវិជ្ជាបារាំងខ្មែរហើយ បានសិក្សាតទៅទៀតក្នុងសាលាកូលេសស៊ីសុវត្ថិកំណត់ ២.៣ ឆ្នាំ ក៏ដេញប្រយោគបានសញ្ញាបត្រ ទុតិយសិក្សាវិជ្ជាបារាំងខ្មែរទៀត រួចពីនោះទ្រង់មានប្រាថ្នាចង់ឲ្យបានស្គាល់ខាងភាសាបារាំងតទៅ ក៏បានសុំចូលសិក្សាក្នុងសាលាកូលេស សាស៊្រលូឡូបា នៅក្រុងព្រៃនគរទៀត ហើយដល់មកខែសូយេត ឆ្នាំ១៩១៨ ទ្រង់ដេញប្រយោគបានសញ្ញាបត្រ ប្រឺវេអេឡេម៉ង់-ទែរថែមទៀត តពីនោះមកទ្រង់បានចូលធ្វើរាជការក្នុងក្រុមព្រះអាលក្ខណ៍ រួចពីនោះ រាជការបាត់ទៅធ្វើរាជការនោប៉ុយរ៉ូ ទី ២ នាទីរាជការរេស៊ីដង្ត ស៊ុប៉េរីយ៉ើរ និងនៅទីប៉ុយរ៉ូរាជការតំណាងរេស៊ីដង់ ស៊ុប៉េរីយ៉ើរ មកប្រប សេនាបតីក្រសួងយុត្តិធម៌ខ្មែរ ។

គ្រាក្រោយមក ដោយទ្រង់មានប្រាថ្នានឹងសិក្សាឧត្តមវិជ្ជាទៀតនោះ ទ្រង់បានប្រឡងចូលធ្វើជាសិស្សសាលារដ្ឋបាលតុលាការខ្មែរ ទ្រង់ប្រឡងចូលជាប់លេខ១ បានសិក្សាកំណត់ ២ ឆ្នាំហើយដោយសតិបញ្ញានិងសេចក្តីព្យាយាមយ៉ាងមាំមោះ ទ្រង់បានប្រឡងចេញជាប់លេខ ១ ទៀត តពីនោះ

មកទ្រង់បានតាំងជាអនុមន្ត្រីបម្រុងរាជការក្នុងដំណែងរាជការខ្មែរ ហើយដាក់ឲ្យនៅក្រៅដំណែង ដើម្បីបំពេញមុខក្រសួងជាអធិបតីរងក្រុមព្រះអាលក្ខណ៍ និងជាអែដឺកុងព្រះករុណា ជាអម្ចាស់ជីវិតលើត្បូង ។

ក្រោយមកទៀតទ្រង់បានឡើងថ្នាក់ត ១ មក ជាអនុមន្ត្រីទី ២ និងទី ១ នៅក្រសួងគ្រប់កន្លែងដែលទ្រង់បានធ្វើការមានសេចក្តីស្រឡាញ់រាប់អានគ្រប់គ្នា ហើយមានសេចក្តីសរសើរជាច្រើន ដោយទ្រង់មានឧតម្រិះប្រាជ្ញាធ្វើរាជការត្រឹមត្រូវល្អ ។

កាលពីក្នុងខែសេបតម ឆ្នាំ ១៩២៦ ដោយទ្រង់ធ្វើរាជការមកនឿយណាស់ ហើយដោយមានរោគធ្លាក់ពោះវៀនបាយទៅខាងក្រោមផងនោះ ទ្រង់ក៏អាពាធ ហើយបានសុំច្បាប់ឈប់ដោយមានសេចក្តីសង្ឃឹមថាទៅថ្ងៃមុខនិងបានចូលទៅធ្វើរាជការវិញ ប៉ុន្តែឯរោគនោះចេះតែចម្រើនធ្ងន់ឡើងបន្តិចម្តង ៗ លុះដល់ទ្រង់ សុំអនុញ្ញាតឈប់ធ្វើរាជការ សម្រាកព្រះកាយពេលកំណត់ ៣ ឆ្នាំ ហើយទ្រង់បានស្តេចទៅយកខ្យល់អាកាសនៅមាត់សមុទ្រនាទី ១ ហៅថាព្រែកក្តាត តាមសេចក្តីដែលគ្រូពេទ្យបានទូន្មាន តែព្រះរោគនោះ ចេះតែថែមធ្ងន់ឡើងឥតអាក់ ធ្វើឲ្យព្រះកាយថយកម្លាំងជុនជាបជាខ្លាំង ។

ឯសមាគមរបស់យើងខ្ញុំរាល់គ្នា នេះជាការកើតឡើង ព្រោះអ្នកអង្គម្ចាស់សិង្ហា ទ្រង់បានផ្តួចសេចក្តីតាំងពីកាលទ្រង់នៅជាអ្នករៀនក្នុង

សាលាវេជ្ជបាលតុលាការខ្មែរម្ល៉េះ ប៉ុន្តែក្នុងវេលានោះឥតមានអ្នកជួយជ្រោមជ្រែងឲ្យគ្រប់គ្រាន់បរិបូណ៌ ឯសេចក្តីដែលទ្រង់បានផ្គង់នោះ មិនអាក់ខានទៅសោះឡើយ គឺតពីនោះមកបានតិច ទ្រង់បានជួបនិងមិត្រខ្លះ ហើយក៏ក្រជុំគ្នារៀបតែង សេចក្តីរៀបដំណែង របស់សមាគមយើងឡើង កើតបានជាសមាគម ១ រំពេចបំពេញសេចក្តីបំណង់ដល់អ្នកនាំបង្កើតនេះៗ

អ្នកអង្គម្ចាស់សិង្ហា បានបង្កើត សមាគមក្រៅពីក្រុមនេះទៀត កាលពីឆ្នាំ ១៩២៥ ទ្រង់បានជ្រាបថាខេមរសមាគម ទើបនឹងតាំងបង្កើតឡើងជាដំបូងនោះ ទ្រង់ក៏បានញុំាងក្រុមចូលហ៊ុន តាំងប៉ុន្មានឲ្យមានសេចក្តីខំប្រឹងគំរូញាក ហើយបានបញ្ចុះបញ្ចូល ដល់ជាតិក្រស័ត្រគ្រប់អង្គនិងបណ្តាព្រស្ត ដែលមានទ្រព្យសម្បត្តិច្រើនឲ្យចូលភ្ជាប់ខ្លួនក្នុងការនេះ ប៉ុន្តែដោយអ្នកកាន់កាប់ការ តាំងប៉ុន្មានមិនប៉ុនប្រសប់ ក៏សមាគមនេះរលាយទៅ អ្នកអង្គម្ចាស់សិង្ហា បានសង្គ្រោះយកគោលសមាគមនេះពីសេចក្តីអន្តរាយជាច្រើនដងណាស់ ។

សេចក្តីដែលមិនបានសម្រេចតាមប្រាថ្នាខាងលើនេះ នាំឲ្យអ្នកអង្គម្ចាស់សិង្ហាគិតខុសព្រោះឃើញថាគំនិតដែលផ្តើម ឲ្យបានបម្រើផលាសម្បត្តិដល់ព្រះនគរដែលជាតិខ្មែរបានបង្កើតឡើងនោះស្ទើតស្រពោនសាបសូន្យទៅវិញ ហើយមិនមែនព្រោះតែរឿងប្រាក់កាសដែលទ្រង់បានចេញជួយដោយស្មោះ ពីព្រះរាជហឫទ័យនោះទេ ដែលនឹងនាំឲ្យអ្នកអង្គម្ចាស់

សិង្ហការង្គស្វារតី គឺពីព្រោះតែគំនិតយ៉ាងឧត្តម ១ ក្នុងការផ្សព្វផ្សាយសេចក្តី ខួបខាតរបស់ខ្មែរ ឲ្យបានចម្រើនឡើងវិញ ។

ទ្រង់មិនបានបោះបង់គំនិតដែលនេះឡើយ គឺនៅវេលាក្រោយដែល ខេមរសមាគមរលាយទៅនោះទ្រង់ព្រះតម្រិះថានឹងតាំងបង្កើតជាហិបប្រាក់ ជំនួយរបស់ក្សត្រាធិការ ១ ដែលមានប្រាក់ដើមចំនួន ៧០.០០០ រៀល ។ ហើយដែលទ្រង់ចេញទាំងអស់ដែរ ១ ព្រះភាគឯង តែសេចក្តីមរណៈមក នាំយកទៅដោយទាំងគំនិតដ៏ឧត្តម ដែលទ្រង់បានគិតទៅជាមួយផង ក្នុង វេលានេះខ្មែរក្រុងកម្ពុជា ខាតកូនសម្លាញ់ ១ នាក់ចេញ ។

កាលពីឆ្នាំ ១៩១៨ ទ្រង់បានរៀបអភិសេកមង្គល និងអ្នកអង្គម្ចាស់ ក្សត្រី ង៉ាវេតារង្សី ជាព្រះរាជបុត្រីសម្តេចក្រុមព្រះ ព្រះ តែវ៉បញ្ញា- ម្នុជីវង្ស អធិបតីក្រុមសន្ធិហ: ហើយបង្កើតបានព្រះរាជបុត្រ ៤ អង្គនៅ តូច ៗ ណាស់ដែលទ្រង់ទុកនៅជាខាងក្រោយ ។

មិត្តទាំងអស់ក្នុងក្រុមសមាគមបណ្ណាល័យសិស្សាសាលាវត្តបាល ត្រូលាការខ្មែរ បានមកជួបជុំគ្នាក្នុងវេលានេះ ដើម្បីបង្ហាញខ្ញុំសោយទុក្ខ ជាទីគោរព ចំពោះព្រះរាជអង្គ ទ្រង់ទាំងប៉ុន្មាន ហើយព្រមទាំងរៀបធ្វើ បុណ្យឧទ្ទិសថ្វាយព្រះរាជកុសលក្នុងថ្ងៃស្អែកនេះ ដោយក្រុងជំនុំកាន់កាប់ សមាគមជាអ្នកចាត់ការ ។

ក្នុងនាមមិត្តភក្តិទាំងអស់ និងក្នុងនាមខ្ញុំសូមណាអ្នកជាស្រប ស្របឡើងហើយ ខ្ញុំសូមព្រះ [illegible] ជុំវិញមេត្តាបទមគ្គភក្តិបរិសុទ្ធជាតិមុខ ។

# ធម៌ទេសនាអំពីព្រះនិព្វាន

## របស់លោក គីម៉ងផង់ រូបែរតី សម្ដែងនៅព្រះរាជបណ្ណាល័យ

## កាលពីថ្ងៃ ៩ យូរ៉ាំង ឆ្នាំ១៩២៧ ក្រុមការ ជុំ ម៉ៅ

## បានស្រង់យកគោលធំ ៗ សុទ្ធក្នុងនិកាស

## ជាមុនដែលសម្ដែងជាភាសាបារាំង

---

សេចក្ដីស្រង់អំពីធម៌ទេសនាលោកគុំម៉ងផង់ រូបែរត៍ កាលពីក្នុងខែ អាវ្រីល ឆ្នាំ ១៩២៦ លោកគុំម៉ងផង់ រូបែរត៍ បានអញ្ជើញមកសម្ដែងធម៌ទេសនាម្ដង ក្នុងព្រះរាជបណ្ណាល័យអំពី អរិយសច្ច ទាំង ៤ ប្រការ ហើយនៅថ្ងៃ ៩ យូរ៉ាំង ឆ្នាំ ១៩២៧ នេះ លោកមកសម្ដែងទៀត អំពីព្រះនិព្វាន ។

ធម៌ទេសនាលើកទី ២ នេះ លោកសម្ដែងអំពីអំពីមាគ៌ាសេចក្ដីនិងការនាំ ជាឧបនិស្ស័យឬជាផ្លូវទៅកាន់ព្រះនិព្វាន ដែលអ្នកកាន់ពុទ្ធសាសនា ទាំងសង្ឃនិងគ្រហស្ថ ផ្ចង់ចិត្តសំដៅយក ហើយភ្ជាប់ហើយ អំពីផ្លូវផង ប្រយោជន៍ ដែលនាំឲ្យរកព្រះនិព្វានមិនឃើញ គឺកិរិយាប្រព្រឹត្តធូរពេក និងតឹងពេក ដែលហៅថា កាមសុខល្លិកានុយោគ និង អត្តកិលមថានុយោគ ព្រមទាំងសម្ដែងអំពី មជ្ឈិមបដិបទា ដែលជាផ្លូវនាំទៅកាន់ព្រះនិព្វាន ។

អធិប្បាយអំពីរូបឈាន ៤ អរូបឈាន ៤ ដែលហៅថាសមាបត្តិ ៨ ប្រការ និងឈានថ្នាក់ខ្ពស់បំផុតដែលផ្សាល់នឹងព្រះនិព្វាន ហើយដែលហៅថា សញ្ញាវេទយិតនិរោធ មានឧទាហរណ៍ថា ព្រះអរហន្តទាំងឡាយ លោកបានដឹងច្បាស់នូវព្រះនិព្វាននោះណាស់ តែដែលឃើញច្បាស់នោះ គឺជាប្រាកដតែក្នុងចិត្តនឹងយកសេចក្ដីដែលជាក់ច្បាស់នោះ មកស្រាយឲ្យបំផុតការមនុស្សយើងដូច្នេះដូច្នោះ មិនកើត ព្រោះគ្មានពាក្យនិងថាឲ្យចំ មានអ្នកប្រាជ្ញជាតិអឺរុបម្នាក់ឈ្មោះ ម៉ាក់មុល្លែរ ដែលបានសិក្សាគម្ពីរក្នុងពុទ្ធសាសនាយ៉ាងជ្រៅជ្រះជាងគេ សម្ដែងថាព្រះនិព្វាននោះយើងបានដឹងថាមានដោយពិតណាស់ តែនឹងថាឲ្យចំជាយ៉ាងនេះ ឬយ៉ាងនោះ មិនកើត ម្យ៉ាងទៀតមានអ្នកប្រាជ្ញជាភិក្ខុឈ្មោះ សង្ឃរក្ខិត សម្ដែងថា មនុស្សម្នាក់ដែលមិនដែលស្គាល់ពណ៌លឿង ឬខៀវ និងថាមនុស្សខ្វាក់ភ្នែកមិនស្គាល់ពណ៌ ឬថាក្នុងលោកនេះឥតមានពណ៌ ក៏ថាមិនបាន ។

មានសម្ដែងអំពីន័យផ្សេង ៗ ដែលអធិប្បាយពន្យល់អំពីព្រះនិព្វាន ក្នុងគម្ពីរនានា ជាគម្ពីរ សំយុត្តនិកាយ មជ្ឈិមនិកាយ មហាវគ្គ ធម្មបទ អភិធម្មកោស ជាដើម ហើយសរុបសេចក្ដីទៅឃើញថា ព្រះនិព្វាននេះ មិនមែនជាសូន្យទទេឡើយ គឺនៅមានសល់គុណជាតិ ១ ដែលយើងនឹងថា ឲ្យចំពោះមិនបាន មានឧទាន ១

ពណ៌នាថា កាលនោះមានពុទ្ធបរិសទ្យ ១ អង្គចូលនិព្វាន ហើយព្រះសម្មាសម្ពុទ្ធទ្រង់សម្តែងថា រូបខន្ធរបស់អ្នកនោះ ក្លាយទៅហើយ វេទនាខន្ធក៏ស្ងប់រម្ងាប់ ឬស្ងិតទៅអស់ សញ្ញាខន្ធ ក៏រលត់ សង្ខារខន្ធក៏ទៀយណាយ អស់អំណាច មិនអាចតាក់តែងរូបនិងនាមតទៅទៀតបាន ឡើយ វិញ្ញាណខន្ធ ក៏ចូលទៅអាស្រ័យកន្លែងទីជ្រក ។

គម្ពីរសំយុត្តនិកាយ មានសម្តែងអំពីគោធិកភិក្ខុចូលនិព្វាន ហើយព្រះពុទ្ធអង្គអធិប្បាយនឹងពុទ្ធបរិសទ្យថា វិញ្ញាណរបស់គោធិក ដែលចូលនិព្វាននោះ ឥតមានសល់ជ្រកនៅទីណា ។ ឡើយ ហើយវិនិច្ឆ័យសេចក្តីទាំង ២ យ៉ាងនេះថា ឯសេចក្តីទី ១ ដែលថាវិញ្ញាណចូលអាស្រ័យកន្លែងជ្រកទីឈប់នោះ យើងនិងថាគ្មានវិញ្ញាណក៏ថា មិនបាន ឯសេចក្តីទី២ ដែលថាវិញ្ញាណឥតមានសល់ជ្រកនៅ កន្លែងណា ។ ឡើយ នោះយើងត្រូវយល់ថា ឥតមានសល់ជ្រកនៅក្នុងទីណា ។ ក្នុងលោកយើងនេះទេ ព្រោះព្រះនិព្វាន ជាលោកដទៃផ្សេង អំពីលោកយើង ។

មានបុច្ឆាថា ចុះហេតុអ្វីបានជាព្រះសម្មាសម្ពុទ្ធ មិនសម្តែងឲ្យច្បាស់ថាព្រះនិព្វាននោះជាអ្វី ត្រង់នេះឃើញមានសេចក្តី ដែលព្រះអង្គទ្រង់សម្តែងនឹងមាលុង្ក្យបុត្រ ថាព្រះនិព្វាននោះ ជាគុណជាតិល្អិតជ្រៅពេកណាស់ ហួសវិស័យអ្នកស្តាប់ត្រូវឲ្យគិតតែអំពីអរិយសច្ចទាំង ៤ វិញ ព្រះសម្មាសម្ពុទ្ធសម្តែងក្នុងឧទាន ១ ថា ព្រះនិព្វាននោះជាទីដែលគ្មាន ទឹក

ដី-ភ្លើង-ខ្យល់ មិនមែនជាកលាងទេស្អាត មិនមែនជាទីដែលគ្មានអ្វីសោះ មិនមែនជាមានវិញ្ញាណ មិនមែនជាឥតវិញ្ញាណ មិនមែនជាក្នុងលោកនេះ មិនមែនជាក្នុងលោកខាងនាយ មិនមែនជាយប់ និងមិនមែនជាថ្ងៃ ។

បើដូច្នេះតថាគតមិនហៅថាមក - មិនហៅថាទៅ - មិនហៅថានៅ - មិនហៅថាស្លាប់ - មិនហៅថាកើត ហៅថាគ្មានដើម - គ្មានទៅជាអ្វី គ្មានផុត គឺជាសេចក្តីរំលត់ទុក្ខ ឥតត្រឡប់មកកើតវិញ ។

នៅវេលាដែលព្រះអរហន្ត លោកចេញអំពីឈានមកវិញនោះលោកបន្ទឺបចីកេទថាដូច្នេះ ព្រះនិព្វានជាទីរំលត់នូវសេចក្តីប្រាថ្នា,ជាទីសប្បាយ ជាទីសុខបំផុតរកអ្វីផ្ទឹមមិនបាន ប៉ុន្តែនិងអធិប្បាយអំពីសេចក្តីសប្បាយ សេចក្តីសុខនោះ ជាដូច្នេះដូច្នោះមិនបាន ដូចបានពោលមកខាងដើម បើដូច្នេះតើយើងត្រូវវិនិច្ឆ័យសេចក្តីថា ព្រះនិព្វាននោះ ទទេសូន្យឥតមានអ្វីសោះ ឬអ្វី? ។

សេចក្តីដែលបញ្ចប់នោះ បានញែកព្រះនិព្វានជា ២ ចំណែក ១ និព្វានធម្មតា ឬ សឧបាទិសេសនិព្វាន ដែលព្រះអរហន្តលោកបានដល់តាំងពីកាលរស់នៅ ១ ទៀតគឺបរិនិព្វាន ឬ អនុបាទិសេសនិព្វាន ដែលចាប់តាំងពីព្រះអរហន្តទម្លាយបញ្ចខន្ធទៅ ។

ឯព្រះនិព្វានធម្មតានោះ គឺជាកិរិយាដែលព្រះអរហន្តតាំងឆ្ងាយ [illegible] សញ្ញា សេចក្តីពិតប្រាកដ សេចក្តីទៀងជានិច្ច

ឥតកើត ឥតស្លាប់ នៅវេលាដែលកំពុងធ្វើឈាន ឯចរិមញ្ញាណវិញនោះ គឺជាទីសុខទីទៀងជានិច្ច ឥតប្រែប្រួល ដែលមានតាំងនៅហើយ ដែលយើងនឹងថាជាអ្វីឱ្យចំមិនកើត ។

ធម៌ទេសនានេះ ថ្ងៃក្រោយនឹងមានបោះពុម្ពជាសេចក្ដីពិស្ដារ នៅវេលាដែលបានប្រែជាភាសាខ្មែរហើយស្រេច ។



| | | |
|---|---|---|
| កំណត់ជន្មា | នរកនោះហា | រយឆ្នាំប្រមាណ |
| គិតគណនាឆ្នាំ | ត្រូវប្រាំបួនលាន | មនុស្សនេះទើបបាន |
| | មួយថ្ងៃនរក | ។ |
| លន់លុះរដោះ | ពីនរកនោះ | មកមិនដែលសុខ |
| កើតជាមច្ឆា | មានទាជ្រូកស្រុក | គេកាប់ហាប់លក់ |
| | ប្រាំរយជាតិជាក់ | ។ |
| ទៀតទើបកើតជា | មនុស្សមានទោសា | គេបាញ់គេពាក់ |
| គេដោតគេកាប់ | សម្លាប់ឥតអាក់ | ប្រាំរយជាតិជាក់ |
| | ពិតពុំសុខអង្គ | ។ |
| ហើយយកជាតិជា | មនុស្សមានរោគា | ដំបៅភកឃ្លង់ |
| ជាមនុស្សគបគាក់ | ខ្វាកថ្លង់ខ្វិនខ្វង់ | [illegible] |
| | ក្ដួរអប្រិយ | ។ |
| បើបានសក្តិបុណ្យ | ត្បិតផលជាតិមុន | បានហេតុមកក្ដី |
| ពៀរកម្មកត្តា | ឲ្យអាយុខ្លី | កុំឃើនឈឺ |
| | ជំងឺដល់ចាស់ | ។ |
| នោះទុក្ខ [illegible] | កាយកម្ម [illegible] | [illegible] |
| ប្រឡាប់លែងភាព | [illegible] | [illegible] |
| | [illegible] | ។ |

ខ្លាចបាបខ្លាចបាប ចៀសចាកផុត ជីវិតសត្វសល់
ពិតពុំពាណា រក្សាតម្កល់ ចិត្តចាំសីលផល
បាណាតិបាត ។

បានទៅកើតនា សួគ៌ឋានមហា· ពជិកាជាតិ
ជាអគ្គទេវបុត្រ បរិសុទ្ធស្អាត ស្ថិតលើប្រាសាទ
ប្រាំពីរយោជន៍គត់ ។

ស្រីទេពកញ្ញា ប្រាំយេអគ្គា បម្រើបាទបត់
ចូលបន្ទំគាល់ វៀនកល់ប្រាកដ ប្រកបកំណត់
កំណាន់សព្វថ្ងៃ ។

ប្រាំយេឆ្នាំគត់ ទើបទេពច្យុត មកកើតនៅភ្ល
ត្រកូលក្សត្រិយ៍ក្សត្ត សន្តានថ្លាថ្លៃ រូបពន្ធល្អក្រៃ
មានលក្ខណាគ្គាត់ ។

មានកម្លាំងធំណន មានចិត្តទៅទន់ ប្រណីទុក្ខសត្វ
មានគុណខាននៅ ញាតិផៅពុំព្រាត់ ពុំប្រាសខ្លាយខ្លាត់
ជាសុខដល់ចាស់ ។

ពុំដែលក្សិណក្ស័យ ជីវិតប្រាល័យ ដោយគ្រឿងសហាស
បាទារិការពេក អនេកច្រើនណាស់ ឥតទុក្ខទោសទាស់
ឥតព្យាធិ៍រោគា ។

ឥតមានសត្រូវ　កំណាចគ្រាតគ្រូវ　បៀតបៀនបណ្ដា
អាយុយឺនយូរ　បរិបូណ៌ជន្មា　នេះផលបុណា
គិតបុត្រប្រធាន　។

អធិដ្ឋានា　មនុស្សល្អប្រវព្យា　គេគិតចង់បាន
បំបាត់បញ្ចោត　បំពោតបំពេន　បំភាអាងមាន
យសសក្តិខ្ពរខំ　។

លុះលែងជាតិទៅ　នរកនាមហៅ　កាឡសូត្រអស់យម-
ក្ពបាលចាប់ចង　ដាក់ផងដាល់ដំ　ឈើផ្កាភោគពុំ
សុខសោយទុក្ខា　។

ទើបយកបន្ទាត់　ដែកដុតមកផ្ទាត់　សុខសព្វកាយោ
ខ្វះយករណារ　មកអារអង្គារ　ពុះពីសិរសា
ទល់ទុក្ខទោរទន់　។

ឈាមហូរសស្រាក់　ស្រែកយំឥតអាក់　គិតភ័យតាំងកាន់
នៅនានរក　វេទនាកំណាន់　កំណត់មួយពាន់
ឆ្នាំទើបរដោះ　។

មួយពាន់ឆ្នាំត្រែ-　ត្រឹងស្រទើបមួយថ្ងៃ　ទានរកនោះ
យូរពន់ប្រមាណ　លុះបានរួចរស្លោះ　ពីនរកនោះ
មកជាប្រែតបាន　។

កម្ពស់ត្នោតវៃ　រូបអាក្រក់ក្រៃ　រកស៊ីស៊ីគ្មាន
ស៊ីសំណៃលាមក　ជាទុក្ខអត់ឃ្លាន　ប្រាំរយជាតិបាន
មកកើតជាមនុស្ស ។

កំសត់ពិបាក　អត់ឃ្លានគោកយ៉ាក　ទុគតិទុយិស
ដើរសូមទានស៊ី　ឥតគេសប្បុរស　ក្រៃណាខ្វត់របស់
ប្រាំរយជាតិទៀត ។

មានទ្រព្យតិចតួច　ចោរចាំលបលួច　បានបាត់បង្វៀត
កើតជាខ្ញុំគេ　ម្ចាស់ជេរកេយទៀត　បាបគៀតបៀនបៀត
ទ្រព្យអ្នកដទៃ ។

បើអ្នកឯណា　មួយមានប្រាជ្ញា　ដវនវ៉ៃ
រៀនចាកទិន្នា　ទានជាបច្ច័យ　មគ្គផលអាស្រ័យ
សមាធិបរិភោគ ។

រៀនជំនួញប្រាំ　ប្រការចងចាំ　ចិត្តៈបេះអបោគ
អធ្យាស្រ័យយល់　ទៅផលបរលោក　ខ្លាចកម្មទុក្ខសោក
ជិតជល់អាត្មា ។

អ្នកនោះមិនបាន　ទៅកើតនៅស្ថាន　សួគ៌ត្រៃត្រឹង្ស
មានរាំងរាប្បុរ　បរកេញ្ញា　មួយពាន់ពោមជា
បរិភោគទិ៍គាល់ ។

បិតវិមានខ្ពស់ ប្រមាណតួទស យោជន៍យល់ធើតឆាយ
ត្រដែតត្រដួច បន្ទួចរៀងកល់ សឹងមានពិព័រណ៌
ពិពិធរចនា ៗ

សោយសុខប្រមាណ មួយពាន់ឆ្នាំមាន ទើបយកជាតិជា
ត្រកូលក្សត្រិយ៍ក្សាន្ត វៃនមានប្រាជ្ញ ធនធានសក្កា
ច្រើនពន់ពេកក្រៃ ៗ

ទើបយកជាតិជា ត្រកូលខែមហា សេដ្ឋីប្រពៃ
មានទ្រព្យរបស់ សក្តិយសថ្លាថ្លៃ ឥតអ្នកដទៃ
ណាទឹងបៀតបាន ៗ

ពោះពោរខ្ញុំទាំង សត្រូវបៀតទាំង ឈាយលោកធនធាន
ចិត្តចង់វិកល ប្រមាទពុំបាន ហេតុនោះអ្នកមាន
ផលលះលោកលែង ៗ

កាមេសុមិច្ឆា ពោះអ្នកឯណា ចិត្តនោះវង្វេង
លួចភរិយាគេ គេឯងមាសក្រួង ស្រីផិតប្តីឯង
អំពើពោតគុត ៗ

អ្នកនោះទឹងទៅ ដល់ក្នុងនិរ្យទៅ សំឃាដនរក
ទាំងប្រុសទាំងស្រី [illegible] ប្រូរដៃពោលទុក
កំបុតកមហិមា ៗ

ប្រាំពាន់ឆ្នាំណា  សួគ៌តុសិតា  ទើបបានមួយថ្ងៃ
ពេរពេនរក  រងទុក្ខរងភ័យ  យឺនយូរកម្រៃ
កម្មរដោះ ។

លុះរួចមកបាន  កើតជាប្រែតប្រាណ  អសោចិសូទ្យសោះ
កម្មកើតអគ្គី  ឆេះពីមាត់នោះ  ស៊ីសឹងឈាមខ្ទុះ
ជាតិជាអាហារ ។

ទើបកើតជាមនុស្ស  អាក្រក់ទុរយស  មាត់វៀចឆែបឆា
កើតជាមនុស្សល្ងង់  គច្ងង់ឥតការ  ឥតកេរ្តិ៍អសារ
អាសោចិពីមាត់ ។

បើអ្នកឯណា  វៀរពាក្យមុសា  វាងវៀរគិតគាត់
កាន់សច្ចវាទី  ស្រដីពាក្យសត្យ  នឹងបានសម្បត្តិ
សួនសោយសុខា ។

ពិភពតុសិត  អាយុយឺនក្លាត់  បួនពាន់វស្សា
មានទេពអប្សរ  បរេធិកា  បួនពាន់ជាតិជា
បរិវារសព្វថ្ងៃ ។

បិតលើប្រាសាទ  ប្រសើរស្អាងស្អាត  សឹងកែវប្រែ
ខ្ពស់ម្ភៃប្រាំយោជន៍  ស្រោងស្រោបត្រពែប សុខសប្បាយប្រែ
ឥតឯឧបមា ។

បានបួនពាន់ឆ្នាំ ទើបផុតសោកចាំ ចុះមកកើតនា
ត្រកូលក្សត្រិយ៍ក្សត្ត មែនមានប្រាជ្ញា ទើបទៅកើតជា
អ្នកប្រាជ្ញព្រះធម៌ ៗ
មែនមានពាក្យសត្យ ពាក្យពិរោះក្កាត់ ព្រះចាំអស់អាថ៌
ចំណោទប្រស្នា បញ្ហាសព្វសារ- តើពុំទើសទាល់
ដល់ប៉ុនកេសី ៗ
ស្រុក!មេរយា រីមនុស្សផឹកស្រា ក្កួចភ្នាំងស្មារតី
ត្រសាលជាល្បែង ពុំក្រែងពារី- បាកបាបស្រដី
ពុំជឿធម្មា ៗ
ទីងធ្លាក់ទៅនៅ នរកជ្រៅលាជ្រៅ រូបរងវេទនា
ដល់ជាបនរក ទលទុក្ខមហិមា យំនយូរគណនា
ប្រាំបីពាន់ឆ្នាំ ៗ
ហេតុចិត្តវង្វេង ធីកទឹកចន់ដែង ក្តៅក្តាត់ដោកជាំ
រលាករលុះ ពន់ពុះដោយកម្ម ប្រាំបីពាន់ឆ្នាំ
និម្មានរតី ៗ
ទើបបានមួយថ្ងៃ នរកយូរក្រៃ លន់លុះឡើងពី
បាបបានកើតជា យក្សាគិរិយ ជាមនុស្សអប្រិយ
សឹងឆ្កួតពុធក្យ ៗ

មានពាក្យអសុរស　　ពាក្យរឹងត្រគោះ　　លលើលលា
អ្នកផងតិះដៀល　　ដំនៀលនិន្ទា　　ជាមនុស្សមោហា
　　ជួជាតិខ្លួនខ្លៅ　　ៗ
បើអ្នកឯណា　　វៀរសេពសុរា　　នោះនឹងបានទៅ
សោយសុខស្ថិតស្ថាន　　ពិមានសន្ធៅ　　សឹងកែវនិត្យនៅ
　　និម្មានរតី　　ៗ
ពីព្រោះប្រាសាទ　　សាមសិបយោជន៍ស្អាត　　ប្រកបនឹងស្រី
ទេពអប្សរសួគ៌　　គាប់គួរប្រាំបី　　ពាន់ឆ្នាំទិព្វពីរ
　　នោះមកកើតជា　　ៗ
ត្រកូលមហាក្សត្រិយ៍　　សេពសោយសម្បត្តិ　　សម្តិទេព
ស្តេចស្តែងថ្កើងថ្កាន　　មែនមានចេស្តា　　ប្រកបប្រាជ្ញា
　　ចេះចាំធម៌គាប់　　ៗ
មានចិត្តខ្លាចបាប　　ខ្លាចពៀរដកប　　មានស្មារតីខ្ជាប់
ជៀនប្រាជ្ញប្រុះ　　ខ្លាស់ធ្លុះវៃឆាប់　　ពាក្យពោលតំនាប់
　　តំនិតសោតធ្ងន់　　ៗ
អំពើទាំងប្រាំ　　ប្រការចូរចាំ　　ចិត្តចេះគិតគន់
បង់បញ្ចវេរ　　កម្មជាខ្មួន　　មិនមានមោះមុះ
　　ទួលពាសពោសទុក្ខ　　ៗ

រក្សាសីលប្រាំ នេះនៃទីងនាំ រូបរួបបានសុខ
ទៀងតាល់និព្វាន មិនមានទោតទុក ផុតពីនរក
សោយសួគ៌សម្បត្តិ ៗ
សម្បូណ៌បច្ចុប្បន្ន បុណ្យបានទ្រព្យធន់ ជួនទាំងមនុស្សស្រត្ន
សិទ្ធីទីស្ថាន ស្ថិតប្រាណផុះខាត់ ខឹងខំកំបាត់
កំចាយបាបកម្ម ៗ
កម្មពៀរវៀរចេញ ចិញ្ចឹមបំណេញ បំណេះចេះចាំ
បំណាចចោទសួរ សមគួរបរិកម្ម កម្មដ្ឋានបំណាំ
វិបស្សនាហោង ៗ

